# ខ្មែរប៉ុស្តិ៍

THE KHMER POST

ISSUE 41 07th-20th August 2009



## រ៉ូបឺត ពើទីត លាលែងពីសាលាក្តីខ្មែរក្រហម

**ភ្នំពេញ, ខ្មែរប៉ុស្តិ៍ : ស៊ុម សុភាឫទ្ធិ**

●●●អង្គជំនុំជម្រះវិសាមញ្ញក្នុងតុលាការកម្ពុជា ឬហៅថា សាលាក្តីខ្មែរក្រហម ដែលមានរឿងចម្រូងចម្រាស់ពុករលួយ បក្ខពួកនិយម រហូតធ្វើឱ្យម្ចាស់ជំនួយមួយចំនួនផ្អាកប្រាក់ខែបុគ្គលិកកន្លងមកនោះ ។ ពេលនេះសហព្រះរាជអាជ្ញាអន្តរជាតិលោក រ៉ូបឺត ពើទីត បានដាក់លិខិតលាលែងនៅថ្ងៃទី1 កញ្ញាខាងមុខ ដែល ក្នុងខ្លឹមសារ ថា មានបញ្ហាផ្ទាល់ខ្លួន និងក្រុមគ្រួសារនៅឯប្រទេសកាណាដា មិនមានពេលវេលាដើម្បីបំពេញការងារ ។

លោក រ៉ូបឺត ពើទីត និងលោកស្រី ជា លាង

ការសម្រេចចិត្តឈប់បំពេញតួនាទីដ៏ខ្ពង់ខ្ពស់របស់ព្រះរាជអាជ្ញារូបនេះត្រូវបានអង្គការសង្គមស៊ីវិលជាតិ-អន្តរជាតិមួយចំនួនថា បណ្តាលមកពីការមិនចុះសម្រុងគ្នា តទៅទំព័រទី ១៩

## មានអ្វីប្លែកនៅហ្វីឡាដែលហ្វីយ៉ា

**ខ្មែរប៉ុស្តិ៍**

**១-សមាគមខ្មែរ**

●●●មហាសន្និបាតសាមញ្ញរបស់សមាគមខ្មែរបានប្រព្រឹត្តទៅក្នុងបរិយាកាសអ៊ឹកធឹក កាលពីថ្ងៃ សៅរ៍ ទី ២៥ ខែ កក្កដា កន្លងទៅនេះ ។ លទ្ធផលបាន ទៅលោក សរិត សម ជាប្រធានក្នុងអាណត្តិថ្មីពីរឆ្នាំម្តងទៀត ។

តទៅទំព័រទី ១៨

## ជំរឿនប្រជាជនសហរដ្ឋអាមេរិក CENSUS

**ខ្មែរប៉ុស្តិ៍**

●●●អ្នកស្រី គ្រេស ខង នៃក្រុមជំរឿនប្រជាជនសហរដ្ឋអាមេរិក បានមកជួបប្រជុំគាំទ្រគ្រួសារខ្មែរ នៅទីស្នាក់ការ WEDGE MEDICAL CENTER

តទៅទំព័រទី ០៩

# វិបត្តិថវិកាបង្ខំឱ្យលុបបំបាត់តំណែងការងារ និងបុគ្គលិក



*●●● ចៅហ្វាយក្រុងហ្វីឡា Nutter បានស្នើច្បាប់ សុំដម្លើង តាក់ លើថ្លៃទិញ ១% និងកែទម្រង់ប្រាក់ចូលនិវត្តន៍ ។ សភាមិនឱ្យទេនោះនឹងមានការកាត់បន្ថយបុគ្គលិកប៉ូលិស ១ពាន់នាក់ ដែលនឹងប៉ះពាល់សន្តិសុខហ្វីឡាខាងជើង ។ នៅឡុងប៊ិច ក៏មានឱនភាពដូចគ្នានេះដែរ :*

**Long Beach, ខ្មែរប៉ុស្តិ៍ : មាជ សុវណ្ណារ៉ា**

វិបត្តិហិរញ្ញវត្ថុ ធ្វើឱ្យសាលាក្រុង Long Beach ប្រកាសភាពអាសន្នពីការកាត់បន្ថយគម្រោងថវិកាចំណាយប្រចាំឆ្នាំ ដើម្បីស្វែងរកដំណោះស្រាយនៃឱនភាពថវិកាដែលកំពុងតែប្រឈមមុខក្នុងស្ថានការណ៍ដ៏គ្រោះថ្នាក់ចំពោះរដ្ឋាភិបាលតំបន់មួយនេះ ។ វិបត្តិឱនភាពថវិកាបានបង្ខំឱ្យសាលាក្រុង Long Beach លុបបំបាត់នូវស្ថាប័នរដ្ឋរបស់ខ្លួន និងបុគ្គលិកជាច្រើននាក់ចាប់ពីខែសីហា ឆ្នាំ 2009 នេះទៅ ។

ចៅហ្វាយក្រុង Bob Foster បានថ្លែងក្នុងសន្និសីទសារព័ត៌មាន នាសាលាក្រុង Long Beach កាលពីថ្ងៃទី30 ខែកក្កដា ឆ្នាំ 2009 ឱ្យដឹងថា ការស្នើកាត់គម្រោងថវិកាក្រុង Long Beach នឹងធ្វើឱ្យមានភាពប្រសើរឡើងដែលសង្ឃឹមថា នឹងធ្វើឱ្យមានឱនភាពថវិកាតិចចុះក្នុងរវាង2ឆ្នាំនៃសារពើពន្ធខាងមុខនេះ ។ "យើងនឹងឆ្លងផុតវិបត្តិនេះ យើងចាត់ចែងវាឱ្យបានល្អ និងយើងប្រឈមមុខនឹងការពិត ហើយយើងនឹងមិនធ្វើអ្វីដែលរដ្ឋកំពុងធ្វើនោះទេ" អ្នកណាបានបើកកកាយគម្រោងរបស់រដ្ឋរឿងខ្ចីប្រាក់រដ្ឋាភិបាលក្រុងនានានោះ យើងកំពុងចាត់ការវាផ្ទាល់ជាមួយនឹងបញ្ហាគម្រោងរបស់យើង ហើយប្រឈមមុខផ្ទាល់ជាមួយវាចំៗតែម្តង ដែលយើងមិនអាចចៀសវាងរឿងនេះបានទេ ។

ស្ថាប័នរដ្ឋរបស់ក្រុង Long Beach ចំនួន 312តំណែង និងបុគ្គលិកចំនួន161នាក់ ដោយរួមទាំង Police 38នាក់ផង ត្រូវបានឱ្យបញ្ឈប់ពីការងារ (Layoff) ។ ដោយបញ្ហា តវិបត្តិថវិកានេះផងដែរ រដ្ឋាភិបាលតំបន់ Long Beach នេះក៏បានបន្ថែមថ្ងៃឈប់សំរាក ការងារមួយថ្ងៃទៀត គឺថ្ងៃសុក្រដោយមិនឱ្យបុគ្គលិករដ្ឋនៅតាមស្ថាប័នមួយចំនួនធ្វើការ ដែលការបន្ថែមថ្ងៃឈប់ធ្វើការមិនបង់ថ្លៃ (Unpaid) ដល់បុគ្គលិកធ្វើឱ្យក្រុង Long Beach សន្សំថវិកាបាន4លានដុល្លារអាមេរិក ។ ចំណែកការកាត់បន្ថយការចំណាយចំពោះការលុបបំបាត់តំណែងការងារ និងបុគ្គលិកដោយការកង្វះថវិកាចំពោះមុខក្នុងគម្រោងថវិកាប្រចាំឆ្នាំ2008-2009 ក្នុងខែ កក្កដា, សីហា និងខែកញ្ញា ឆ្នាំ2009 នេះចំនួន 19.2លានដុល្លារអាមេរិក ។

ចំណែកខ្ទង់ថវិកាចំណាយសំរាប់សិល្បៈគំនូរតាមទីសាធារណៈ ពុំត្រូវបានគេដាក់ក្នុងគម្រោងចាយវាយប្រចាំឆ្នាំទៀតឡើយ ។ ចំនួនទឹកប្រាក់សម្រាប់កម្មវិធីអភិវឌ្ឍន៍អប់រំ និងសេវាកម្មសាធារណៈនានាចំនួន156 គម្រោង



ចាយវាយត្រូវកាត់ផ្តាច់ ។ ក្រុង Long Beach បានកាត់បន្ថយគម្រោងថវិកាប្រចាំឆ្នាំសំរាប់ទឹកប្រាក់សារពើពន្ធ ឆ្នាំ 2009-2010 ចំនួន 6% ដែលធ្វើឱ្យមានឱនភាពថវិកាប្រមាណជាង 38លានដុល្លារ ។

ដោយសារវិបត្តិហិរញ្ញវត្ថុនោះកញ្ចប់ថវិការបស់រដ្ឋាភិបាល តំបន់មួយនេះដែលបានអនុម័តឱ្យ ប្រើប្រាស់សំរាប់ឆ្នាំ 2008-2009 ប្រមាណ 403.9លានដុល្លារ ត្រូវបានកាត់បន្ថយឱ្យចំណាយមកនៅត្រឹមតែ380លានដុល្លារ ។

ក្នុងរយៈពេល5ឆ្នាំចុងក្រោយនេះ ចាប់តាំងពីឆ្នាំ2004 ក្រុង Long Beach បានកាត់បន្ថយពន្ធអាករជាបន្តបន្ទាប់ពីខ្ទង់កញ្ចប់ថវិការបស់ខ្លួនប្រចាំឆ្នាំឱ្យធ្លាក់ចុះអស់111.5លានដុល្លារ ។

ការប្រឈមមុខវិបត្តិហិរញ្ញវត្ថុមិនថារដ្ឋាភិបាលសហព័ន្ធ រដ្ឋាភិបាលរដ្ឋ ឬរដ្ឋាភិបាលមូលដ្ឋានតំបន់ក្តីក្រុង Long Beach បានបាត់បង់ថវិកាប្រមាណ30លានដុល្លារចេញពីគម្រោងថវិកាសំរាប់ទីភ្នាក់ងារការស្តារ និងអភិវឌ្ឍន៍ឡើងវិញរបស់ក្រុងខ្លួនដែលធ្លាប់តែផ្តល់ថវិកាឱ្យពីរដ្ឋាភិបាលរដ្ឋ California ។ ហើយវាក៏នាំឱ្យប៉ះពាល់ទៅដល់ស្ថាប័នសុខាភិបាលប្រចាំក្រុងផងដែរប្រមាណ 2.5លានដុល្លារអាមេរិកចាប់ពីឆ្នាំសារពើពន្ធ 2009-2010 ។

គួរបញ្ជាក់ថា បញ្ហាឱនភាពថវិការបស់អាជ្ញាធរក្រុង Long Beach ដែលបានកាត់បន្ថយមុខតំណែង និងនិយោជិករបស់ខ្លួននោះ ។ ក៏ពួកអ្នកដឹកនាំនៃរដ្ឋាភិបាលតំបន់មួយនេះ បានកំពុងស្វះស្វែងធ្វើការចរចាជាមួយរដ្ឋាភិបាលតំបន់នានា និងស្ថា ប័នសហជីពដើម្បីសុំឱ្យជួយសំរួលទទួលយកបុគ្គលិករបស់ខ្លួនជួលយកទៅធ្វើការ បន្តបន្ទាប់ពីពួកគេទាំងនោះ ត្រូវបានបញ្ចប់ឈប់ឱ្យធ្វើការ (Layoff) នៅក្នុងស្ថាប័នរដ្ឋនៃក្រុង Long Beach ៕

**វិភាគនយោបាយ:**

# បញ្ហាវិបត្តិនយោបាយថៃនៅមានបន្ត

**ដោយ : ម៉ម យឹន**

•••ប្រមាណជា ៦ ខែកន្លងមកហើយ ដែលប្រទេសថៃបានលើកតាំងនាយករដ្ឋមន្ត្រីថ្មីមួយ មានទិន្នាការជាគណបក្សប្រឆាំង ហើយបានក្លាយជានាយករដ្ឋមន្ត្រីដោយគ្មានការបោះឆ្នោតសកល ។ នាយករដ្ឋមន្ត្រីនោះគឺ អភិសិទ្ធ វេជ្ជាជីវ៉ា គឺជា



ប្រធានគណបក្សប្រជាធិប៉ាត់ (ប្រជាធិបតេយ្យ) បានត្រូវរដ្ឋសភា បោះឆ្នោតឡើងជានាយករដ្ឋមន្ត្រីបន្តពីលោក សំឆៃ វង់សុវ៉ាត់ ដែលជាបក្សនិយមលោក ថាក់ស៊ីន ដែល ត្រូវកងទ័ពជាតិថៃធ្វើរដ្ឋប្រហារដកចេញពីតំណែង នាយករដ្ឋមន្ត្រី នាថ្ងៃ ១៩ កញ្ញា ឆ្នាំ ២០០៧ ។

លោក អភិសិទ្ធ ត្រូវប្រឈមមុខ និងបញ្ហាជាច្រើន ដែលកើតចេញពីវិបត្តិនយោបាយរបស់អតីតនាយករដ្ឋមន្ត្រី ថាក់ស៊ីន និងនាយករដ្ឋមន្ត្រីពីររូបទៀត ដែលតុលាការជាន់ខ្ពស់ថៃ បានចេញសាលក្រមសម្រេចដកចេញពីតំណែងជាបន្តបន្ទាប់ ។

កាលពីឆ្នាំ ២០០៦ មានក្រុម១ បានក្រោកឡើងសំដែងការពុំពេញចិត្តនឹងការដឹកនាំនយោបាយរបស់លោក ថាក់ស៊ីន ដែលគេយកសញ្ញាអាវលឿង ជាសញ្ញាសំគាល់ថា ជាក្រុមស្រឡាញ់គោរព និងដើរតាមបញ្ជារបស់ព្រះមហាក្សត្រជាប្រមុខ ។

លុះមកដល់ចុងឆ្នាំ ២០០៨ បន្ទាប់ពីគណបក្សនយោបាយនិយមលោក ថាក់ស៊ីន ត្រូវបានដួលរលំទៅ រួចហើយក្រុមនោះ ទៅជាក្រុមបក្សប្រឆាំងវិញម្តង ទើបក្រុមនេះ បានជ្រើសរើសយកសញ្ញារបស់ខ្លួនថា ជាក្រុមអាវក្រហម ។

ក្រុមអាវលឿង និងក្រុមអាវក្រហមនេះ បានប្រឈមមុខដាក់គ្នា ដើម្បីយកត្រូវតែរៀងៗខ្លួន បណ្តាលឱ្យមានបញ្ហាវិបត្តិនយោបាយយ៉ាងធ្ងន់ធ្ងររហូតមកដល់សព្វថ្ងៃ ។

ស្ថានភាពនយោបាយនៅក្នុងប្រទេសថៃ បានបណ្តាលឱ្យអ្នកសង្កេតការណ៍ជាច្រើន បញ្ចេញទស្សនៈខុសៗគ្នា ។

១-មតិខ្លះយល់ឃើញថា ប្រទេសថៃអាចជួបប្រទះនូវការធ្លាក់ចុះនូវកិត្យានុភាពនៅគ្រប់ វិស័យ ដែលប្រទេសនេះធ្លាប់មានពីមុនមកជាពិសេស ក្នុងវិស័យសេដ្ឋកិច្ច មានការថយចុះគួរឱ្យព្រួយបារម្ភ ។ ចំណែកវិស័យសន្តិសុខផ្ទៃក្នុងក៏ជាកត្តាមួយដ៏សំខាន់ដែរ បើសិនណាជាការប្រឆាំងរវាងក្រុមអាវលឿង និងក្រុមអាវក្រហម នៅតែមានសភាពខ្លាំងក្លា ហើយនៅពេលខ្លះឈានទៅដល់ការប្រើអំពើហិង្សាវាយកំទេចបំផ្លិចបំផ្លាញទ្រព្យសម្បត្តិរដ្ឋ និងសម្បត្តិឯកជន ។ មានក្រុមភេរវកម្មខ្លះ បានប្រើអាវុធសង្គ្រាមលបបាញ់វាយប្រហារទៅលើរថយន្តដឹកមេដឹកនាំក្រុមអាវលឿងបណ្តាលឱ្យមានរបួសជាទម្ងន់ជាដើម ។

២- មតិខ្លះយល់ឃើញថា ការដែលមានជម្លោះគ្នារវាងក្រុមអាវលឿង និងក្រុមអាវក្រហមនេះ គឺជានយោបាយគេរៀបចំឡើង ដើម្បីបញ្ជាក់បង្ហាញពីការអនុវត្តលទ្ធិប្រជាធិបតេយ្យពិតប្រាកដនៅក្នុងប្រទេសថៃ ។

ការប្តេជ្ញានៃក្រុមអាវលឿង ធ្វើឱ្យក្រុមនេះមានឥទ្ធិពលយ៉ាងខ្លាំងក្លា ហើយមានបញ្ញវន្តដែលមានចំណេះវិជ្ជាខ្ពង់ខ្ពស់ ទាំងចាស់ទាំងក្មេង ជាចំនួនច្រើនចូលរួម ។ ពួកគេសម្រេចយកផលប្រយោជន៍ជាតិ ជាអទិភាពខ្ពស់បំផុត ជាងផលប្រយោជន៍ផ្ទាល់ខ្លួន ។

ដើម្បីធ្វើឱ្យសេចក្តីប្តេជ្ញាក្រុមអាវលឿងនេះ បានសម្រេចជោគជ័យ ក្រុមនេះបានសម្រេចចិត្តដោយឯកឆន្ទថា ត្រូវតែបង្កើតគណបក្សនយោបាយថ្មីមួយ ដោយតាំងឈ្មោះថា គណបក្សកានមឿងម៉ៃ (នយោបាយថ្មី) ហើយបានតែងតាំងប្រធានបក្សឈ្មោះ លោក គោវិត គៅសៃស៊ុក អគ្គលេខាធិការបក្សឈ្មោះ លោក សុរិយសៃ តាក់កាក់សីឡា ។

គណបក្សកានមឿងម៉ៃ បានប្រកាសសេចក្តីថ្លែងការណ៍ថា " បើកាលណាបក្សខ្លួនបានជាប់ឈ្មោះជាបក្សរៀបចំរដ្ឋាភិបាល ពេលនោះមន្ត្រីទាំងអស់ចាប់តាំងពីលំដាប់ថ្នាក់ខ្ពស់បំផុត រហូតដល់ថ្នាក់ទាបបំផុត ត្រូវតែជ្រើសរើសចេញមកពីបណ្តាបញ្ញវន្តទាំងចាស់ទាំងក្មេងណា ដែលពុំដែលមានឈ្មោះថា ជាជនធ្លាប់ប្រព្រឹត្តអំពើអាក្រក់ផ្ទុយពីគោលការណ៍បន្ទាត់នយោបាយរបស់បក្សជាដាច់ខាត ។



គណបក្សកានមឿងម៉ៃ បានអះអាងបន្តថា គោលដៅធំបំផុតដែល គណបក្សនេះ គឺត្រូវតែទប់ស្កាត់អតីតនាយករដ្ឋមន្ត្រី ថាក់ស៊ីន និងក្រុមអាវក្រហមមិនឱ្យវិល ត្រឡប់មកយកអំណាចវិញបានឡើយ ។

ចំណុចសំខាន់មួយទៀត គឺក្រុមលោក ថាក់ស៊ីន និយមនេះ បានទៅចូលរួមដៃ រួមចិត្តជាមួយនាយករដ្ឋមន្ត្រីខ្មែរសម្តេច តេជោ ហ៊ុន សែន ហើយថា បានលើក ប្រាសាទព្រះវិហារ កោះកុង និងដែនសមុទ្រ ដែលមានសម្បត្តិធម្មជាតិ ឧស្ម័ន និងប្រេងកាតទៅឱ្យប្រទេសខ្មែរ តាមអំពើចិត្តរបស់ខ្លួន (Sic) ។

បក្សកានមឿងម៉ៃ បានសម្តែងប្រតិកម្មប្រឆាំងនឹងនយោបាយរបស់នាយករដ្ឋមន្ត្រីខ្មែរ ដោយប្រៀបប្រដូចគ្នានយោបាយរបស់ លោក ថាក់ស៊ីន ថាមានទាំងអំពើ ទុច្ចរិត ពុករលួយ កេងប្រវ័ញ្ច ហើយនិងថា នាយករដ្ឋមន្ត្រីខ្មែរពុំមែនជាមេដឹកនាំឯករាជ្យ ម្ចាស់ការជាជាតិខ្មែរពិតប្រាកដទេ ។ ដោយសារតែជំនួយ ជាកងទ័ព និងអាវុធយុទ្ធោបករណ៍គ្រប់ប្រភេទពីវៀតណាមនេះហើយ ដែលបណ្តាលឱ្យមេដឹកនាំខ្មែរ ហ៊ានប្រកាសសង្គ្រាមជាមួយថៃ ។



ហេតុការណ៍នៅក្នុងប៉ុន្មានអាទិត្យកន្លងទៅនេះ គឺនៅពេលលោកនាយករដ្ឋមន្ត្រីខ្មែរ សម្តេច ហ៊ុន សែន ទៅធ្វើទស្សនកិច្ចចំនួន២ថ្ងៃ (ទី១៣-១៤ ខែកក្កដា នៅប្រទេសបារាំង លោកបានអនុញ្ញាតឱ្យក្រុមហ៊ុនតូតាល់ ឱ្យចូលមកប្រទេសខ្មែរ ដើម្បីជីករាវរកប្រេងកាត ដោយមិនបាច់ដេញថ្លៃនៅក្នុងតំបន់បី (Block3) ។

សេចក្តីអនុញ្ញាតនេះ ត្រូវបានរដ្ឋាភិបាលថៃ មានប្រតិកម្មប្រឆាំងយ៉ាងខ្លាំង ហើយថ្លែងប្រកាសនៅពេលថ្មីៗនេះថា ប្រទេសថៃមិនយល់ព្រមឱ្យក្រុមហ៊ុនប្រេង កាតណាចូលទៅជីករាវរកប្រេងកាតនៅក្នុងតំបន់បី (Block 3) នេះ ជាដាច់ខាតពីព្រោះតំបន់ នេះពុំបានសម្រេចដាច់ណាត់ថា ជាដែនសមុទ្ររបស់ប្រទេសខ្មែរ ដោយពេញច្បាប់នោះទេ រួមទាំងការជីកយកប្រេងកាត នៃប្រជុំកោះអាចមិសេះ (Poloway) នោះដែរ ។

សូមអញ្ជើញពិនិត្យមើលតាមផែនទី បានជូនភ្ជាប់ជាមួយនេះស្រាប់ ៕

# ទស្សនៈសេដ្ឋកិច្ចៈ អ្នកមានអ្នកក្រ

**ដោយ : ពិន សំខុន**


លោក ពិន សំខុន

●●●ថ្ងៃនេះខ្ញុំចង់លើកពីទស្សនៈសេដ្ឋកិច្ចមួយ ដែលញាំញីអារម្មណ៍របស់ខ្ញុំ ហើយនិងខ្មែរយើងជាច្រើនដែលមានវប្បធម៌ដូចខ្ញុំ ទស្សនៈនោះ គឺ " អ្នកក្រចង់ក្លាយទៅជាអ្នកមាន " ។

វប្បធម៌របស់ខ្ញុំ គឺខ្ញុំចង់ក្លាយជាអ្នកមាន-មានសម្បត្តិជាមហាសេដ្ឋីធានាដល់អនាគតដ៏ភ្លឺថ្លា រហូតដល់ស្លាប់ ដូចរឿងព្រេងជាច្រើន ដែលខ្ញុំធ្លាប់រៀន ឬធ្លាប់ស្ដាប់ដូចពលរដ្ឋឯទៀតៗ ហើយមានអ្នកលើកជំទាស់នឹងទស្សនៈដែលធ្វើមនុស្សក្រឱ្យទៅជាមានសម្បត្តិនោះ ចំនួនតិចតួចបំផុតស្ទើរតែគ្មានសោះ ។

តែរៀងរាល់ពេលដែលខ្ញុំផ្ដើមមានសម្បត្តិហូរចូលហ៊ឹង ពេលណាបំណងនៃការធ្វើបុណ្យនៃចិត្តអាណិតអាសូរ ចិត្តចង់សប្បាយរីករាយចិត្តចង់បញ្ចេញមុខមាត់...មកដល់ពេលនោះភ្លាមដែរ ជាហេតុធ្វើឱ្យប្រាក់ហូរចេញដោយចំណាយចាំបាច់ផង និងមិនចាំបាច់ផង កើតឡើងកាន់តែខ្ពស់ រហូតដល់លើសប្រាក់ចំណូលបន្ថែមពីនេះទៅទៀត ដោយសារនៅសហរដ្ឋអាមេរិកនេះ គេមានបង្កើតប្រព័ន្ធ "ក្រេឌីតខត" សម្រាប់ចាយវាយជំនួសលុយសុទ្ធ ធ្វើឱ្យយើងចាយលើសប្រាក់ចំណូលដោយភ្លេចខ្លួន ។ ដូច្នេះតែកាលណាចាយលើសប្រាក់ចូល បាននិយថា មិនត្រឹមតែគ្មានប្រាក់សន្សំបានប៉ុណ្ណោះទេ ថែមទាំងជំពាក់គេថែមទៀត តើខ្ញុំត្រូវធ្វើយ៉ាងដូចម្ដេចដើម្បីឱ្យមានឡើងវិញ ? គឺត្រូវកាត់បន្ថយការចាយវាយមិនចាំបាច់ ហើយត្រួតពិនិត្យថា តើនៅសល់ប្រាក់ចាយបានចំនួនប៉ុន្មានទៀត ដើម្បីកុំឱ្យ "ចាយលើសប្រាក់ចំណូល" បើសិនមិនបានចាយប្រាក់នោះទេ ហើយទុកវាឱ្យនៅ យូរបានដោយមិនចាយនោះនឹងក្លាយទៅជាប្រាក់សន្សំហើយ មិនយូរប៉ុន្មានខ្ញុំនឹងអាចក្លាយជាអ្នកមានទៅកើត ។

សៀវភៅ The Millionaire... សរសេរថា ជនជាតិ "ស្កុតឡីស" នៅសហរដ្ឋអាមេរិក មានអ្នកមានលុយរាប់លានចំនួន ២៣ % ជាចំនួនច្រើនលើសលុប ដែលពូកែសន្សំលុយពីប្រាក់ចំណូលតិចតួច ហើយពូកែកាត់បន្ថយឱ្យការចាយចាំបាច់ក្លាយទៅជាតូចបំផុត ។ ពីម្ដាយឪពុកទុកឱ្យកូនចៅនូវសម្បត្តិបន្តគ្នាដ៏ស្ដុកស្ដម្ភតែគ្មាននរណាដឹងរហូតដល់មានបណ្ឌិតសេដ្ឋកិច្ចពីររូប SIENLEY & DANKO បានទទួលអាហារូបករណ៍ចូលទៅសិក្សាក្នុងសហគមន៍នៃអ្នកមានអស់រយៈពេល ២០ ឆ្នាំ ទើបដឹងថាសហគមន៍ដែលសម្បូរ "អ្នកមានលុយលាន" ច្រើនជាងគេ គឺមិនមែនសហគមន៍យូរិស ឬអាមេរិ-កាំង-ចិន និងជប៉ុននោះទេ គឺក្រុមមនុស្សដែលសាមញ្ញបំផុត គ្មានវិមានស្កឹមស្កៃ គ្មានហាងរកស៊ីធំៗ គ្មានភាពហ៊ឺហា គ្មានអ្វីពិសេស ក្រុមស្កុតឡីសសោះ។

ខ្ញុំសំគាល់ឃើញថា អ្នកមានលុយរាប់លាន គឺដោយសាររបៀបរស់នៅទំនើបផ្ទះធំៗ រថយន្តថ្លៃថ្នូរហូតមានមនុស្សបម្រើឆ្វេងស្ដាំ ។ នេះជារូបភាពនៃចំណាយមិនចាំបាច់ដ៏ច្រើនឥតគណនា សូម្បីតែសំរាមរបស់ពួកគេក៏អាចចិញ្ចឹមមនុស្សក្រីក្របានច្រើននាក់ដែរ ហេតុអ្វីក៏អ្នកទាំងនោះ នៅតែជា "អ្នកមានលុយរាប់លាន" ឬ "មីលានែ" ទៅបាន ? ទស្សនៈចុងក្រោយនេះ វាផ្ទុយនិង ទស្សនៈនៃពួកស្កុតឡីស នោះស្រឡះ តែទាំងពីរក្រុមនោះ នៅតែអាចជា "មីលានែ" បានដូចគ្នា ។ មនុស្សទាំងពីរប្រភេទនេះ សុទ្ធតែចង់មាន ហើយបង្កើតចរន្តជា "វប្បធម៌ជាអ្នកចង់មាន" មួយ ហើយគោរពតាមជាប្រចាំ-រីឯកូនចៅអ្នកដែលជា "មីលានែ" នោះមិនច្បាស់ជានៅជាអ្នកក្ររហូតទេ បើមិនបានបន្ត "វប្បធម៌ជាអ្នកចង់មាន" នោះទេ កូនចៅពួក "ស្កុតឡីស" ជាច្រើនបានចាយលុយកេរ្ដិ៍អាករម៉ែឪអស់ ហើយក៏ក្លាយជាអ្នកក្រទៅវិញ ដូច្នេះដែរ ដោយសារប្រកាន់ "វប្បធម៌អ្នកចាយ" ។

រូបភាពនៃឧទាហរណ៍នេះ បង្ហាញឱ្យខ្ញុំដឹងថា ខ្ញុំត្រូវតែមានវប្បធម៌មួយជាអ្នកចង់មានជាដំបូងបង្អស់-បន្ទាប់មកទៀតខ្ញុំត្រូវរៀនគិតលេខឱ្យច្បាស់ ដើម្បីកុំឱ្យចាយលើសពីប្រាក់ចូល (ពួកស្កុតឡីសគេមិនចាយលុយឱ្យលើសពី៧៥% នៃប្រាក់ចំណូលទេ ក្នុងករណីណាក៏ដោយ) ក៏ប៉ុន្តែក្នុងអារម្មណ៍របស់ខ្ញុំចេះតែយល់ថា "បើខ្ញុំចង់ក្លាយទៅជាអ្នកមានខ្ញុំនឹងធ្វើបាបកម្មមួយ ដោយខ្ញុំមានអារម្មណ៍លោភលន់នៅក្នុងខ្លួន" ដែលតាំងពីតូចមកម្ដាយឪពុកខ្ញុំ និងវត្តថ្មីនៃខេត្តកំពង់ស្ពឺរបស់ខ្ញុំបានបង្រៀនសីលធម៌ខ្ញុំតែរបៀបនេះ ដូចនេះខ្ញុំមិនអាចទប់ការចាយរបស់ខ្ញុំឱ្យតិចជាង ៧៥ % ដូចពួកស្កុតឡីសបានទេ ដោយសារតែសេចក្ដីត្រូវការរបស់អ្នកឯទៀត និងរបស់ខ្ញុំវាសុទ្ធតែចាំបាច់ទាំងអស់ ហើយបើខ្ញុំមិនចាយប្រាក់នោះឱ្យអស់ទេ ខ្ញុំនឹងត្រូវភរអ្នកដទៃ ដោយខ្ញុំនិយាយថា "ខ្ញុំពុំមានលុយទេ" ការភូតភរនេះ ក៏ជាបំរាមដែលព្រះពុទ្ធសាសនាបានបង្រៀនថែមទៀត ។ ទំនាស់ក្នុងអារម្មណ៍របស់ខ្ញុំ បើចង់មានក៏ខុស បើនឹងក្លាយជាក្រវិញក៏ខុស តើខ្លួនខ្ញុំ ឬគ្រួសារខ្ញុំ ឬសាច់ញាតិ មិត្តនៃវប្បធម៌ខ្ញុំអាចនឹងក្លាយជាអ្នកមានបានដែរឬទេ? ខ្ញុំបានសាកល្បងពន្យល់ពីទស្សនៈទំនាស់គ្នានេះ ហើយបានសេចក្ដីពន្យល់ថា ដរាបណាមនុស្សគ្មានការច្បាស់លាស់ពីចំណោះ "ចង់មាន" ទេនោះ មិនអាចក្លាយជាអ្នក "មីលានែ" បានទេ ហើយម្យ៉ាងទៀតទ្រព្យសម្បត្តិណាដែលបានមកពីភាពក្រខ្វក់ ឬទុច្ចរិតក៏ពុំអាចរក្សាបានយូរលុងដែរ ។

ភាពវិលវល់មិនច្បាស់លាស់ ហើយភាពមិនស្គាល់ទ្រព្យបានមកដោយធម៌នេះហើយ ដែលបានដឹកនាំជីវភាពខ្ញុំ និងអ្នករួមវប្បធម៌ខ្ញុំអស់ច្រើនសតវត្សមកហើយ ។ យើងនាំគ្នាលើកតម្កើងរឿងព្រេងសភាទន្សាយថា ទន្សាយជាភាវៈល្អតំណាងឱ្យខ្មែរ រឿងអាឡេវថា អាឡេវឆ្លាត គួរធ្វើត្រាប់តាមរឿងធនជ័យថា អាជ័យឆ្លាតតែខ្ញុំគេ (បម្រើគេ) គឺទទួលស្គាល់ដោយមិនដឹងខ្លួនថា អំពើបោកប្រាស់អ្នកដទៃ យករួចខ្លួនមួយពេលថា នោះជាអំពើល្អសម្រាប់ប្រើជាមាគ៌ានៃជីវិត ។ ខ្មែរបានបោះបង់វិន័យនៃការគោរពលើទស្សនៈសុច្ចរិត ត្រឹមត្រូវយុត្តិធម៌ ហើយក្លាយជាអ្នកពូកែ "ចែចូវ" (ធ្វើត្រូវយករួចខ្លួនមួយពេល) តាំងពីសម័យបោះបង់មហានគរមកដល់អស់ទឹកដីនាសតវត្សទី ១៦ ដល់បារាំងយកដីមកឱ្យវិញខ្លះហើយ យល់ថាបារាំងរមិលគុណ មិនបានយកមហានគរមកឱ្យខ្លួនវិញនាសតវត្សទី ២០ នេះ វាយបណ្ដេញបារាំងចេញពីកម្ពុជា ដោយកាំភ្លើងឈើបង្ហាញភាពគ្រាន់បើ ។ ទស្សនៈទាំងអម្បាលមាណនេះ បានណែនាំជីវិតខ្ញុំណែនាំជីវិតគ្រួសារខ្ញុំ ជីវិតសាលារៀនខ្ញុំ ទាំងវត្តខ្ញុំ ជីវិតប្រទេសខ្ញុំ...យ៉ាងរឹងមាំ ។ យើងនៅចាំពាក្យសុភាសិត ហើយសរសេរឆ្លាក់អក្សរពុម្ព បិតលើជញ្ជាំងលើកតម្កើងពាក្យ "ខ្មែរស៊ីតទ្រុតមិនចោលចែចូវ" "ប្រាជ្ញាបុណ្យផងកើតដោយប្រណិប័ត្ត" "ទៀងត្រង់មិនឈ្នះទាស់ " ។ល។ ទស្សនៈដែលបាននាំខ្មែរពីជំនាន់ម្ចាស់ការមកជំនាន់សុំទាន និងមិនផ្លាស់ប្ដូរពីអារម្មណ៍ខ្ញុំពីប្រទេសខ្ញុំរហូតច្រើនសតវត្សទៅទៀតទេ ប្រសិនបើគ្មានការហៀរហូរចូលពួកបរទេសជឿនលឿនមកកម្ពុជា ឬបើខ្ញុំពុំបានមកឃើញអរិយប្រទេស ដែលកំពុងធ្វើឱ្យប្រជាជាតិ ពលរដ្ឋគេរុងរឿងដោយវិធីណាទេនោះ ។

ជិត ៤០ ឆ្នាំនៃវត្តមានខ្មែរ នៅលើដែនដីនៃភ័ព្វវាសនា សហរដ្ឋអាមេរិកនេះ ខ្មែរជាច្រើនរាប់ទាំងរូបខ្ញុំមួយទៀតផង រកប្រាក់ចំណូលបានយ៉ាងក្រាសក្រែល រៀនសូត្រយកចំណេះថ្មីៗ និងទស្សនៈថ្មីៗបានច្រើន តែអារម្មណ៍រឹងមាំនៃវប្បធម៌របស់ខ្ញុំនៅតែចង់ឱ្យខ្ញុំចាយវាយទៅលើរបស់មិនចាំបាច់ ឬរបស់ដែលខ្ញុំឥតគ្រោងចាយ ឬរបស់ដែលនាំឱ្យគ្រោះថ្នាក់ទប់មិនបាន ជាហេតុធ្វើឱ្យខ្ញុំនឹងខ្មែរជាច្រើននៅតែក្រីក្រនៅតែមានអំនួតលើភាពក្រីក្រនោះនៅឡើយ...ហើយមួយចំនួននោះ នាំទាំងកូនចៅទៅធ្លាក់ក្នុងអន្លង់ក្រីក្រជាមួយខ្លួនថែមទៀត ជាអន្លង់នៃការមានទំនាស់យ៉ាងជ្រាលជ្រៅរវាងវប្បធម៌ម្ដាយឪពុក និងវប្បធម៌កូនចៅនៅក្រោមដំបូលផ្ទះតែមួយ ។ មានយុវជនមួយចំនួនដែរ ដែលមកដល់ភ្លាម ហើយចាប់យកការផ្លាស់ប្ដូរវប្បធម៌ថ្មីបាន **តទៅទំព័រទី ១៤**

The Khmer Post Directory
East Coast Publication
Regional Editor : Pin Samkhon
Email : pinsamkhon@gmail.com
Writers : Mam Yin
Kim Phean
Im Loeurm
Bopea Chum
Advertising
Marketing Manager:
Sabane Thach
Phone : 267-253-3947
Email : sabane.thach@gmail.com
West Coast Publication
RegionalEditor : Sovannara Meach
Writers : Kim Saroeurn
Ra Neat
Sophea Rith
Mey Sampos
Chan Kosal
Sovann Rith
Phone: (562) 313-2129
Email: sovannara04@yahoo.com

# បើលោកអ្នកចង់បើក ភោជនីយដ្ឋាន

# ខ្មែរ ឬវៀតណាម



## នៅ 5706 North 5th street Philadelphia PA 19120







* កាលពីមុនជាភោជនីយដ្ឋានកូរ៉េ
* ជួសជុលធ្វើថ្មីឡើងវិញ មានគ្រឿងសម្ភារៈ និងបរិក្ខាគ្រប់គ្រាន់ មានតុ កៅអី នឹងប្រពន្ធ័ចំអិនម្ហូប
* តុ កន្លែងអង្គុយ 80
* អាចពង្រីកពាណិជ្ជកម្មបាន បើមាន Liquor Licence
* បន្ទប់ជាន់ក្រោមដីធ្វើរួចហើយ
* មានបន្ទប់ ៣ នៅជាន់ទី២
* អ្នកអាចរស់នៅជាន់ទី២ នោះបាន
* បើកបានភ្លាម Zoning និងលិខិតអនុញ្ញាតិសម្រាប់ភោជនីយ ដ្ឋានមានស្រេច
* អាចទិញតែពាណិជ្ជកម្ម ឬក៏ជាមួយផ្ទះក៏បាន
* តុអាំងសាច់ B.BQ ចំនួន 8

## Equipements Lists

1- 80 Sitting chairs 8 Tables
2- Hood & Cooking systems
3- Central Airs Heat
4- Cash Register
5- B-B-Q Tables
6- Sign
7- TV
8- Karaoke

W
S
N
E

Right Here
5706 N.5th St



N.5TH St.

Chew Ave

**Phone : (215) 668-1666**

# សេចក្ដីសម្រេចតុលាការក្រុងភ្នំពេញ


រូបថតនៅពេលចេញពីតុលាការក្រុងភ្នំពេញ

●●●តុលាការក្រុងភ្នំពេញ ទើបនឹងបញ្ចេញសេចក្ដីសម្រេច នាព្រឹកថ្ងៃទី៤ ដាក់ទោសឱ្យលោកស្រីសមាជិកសភា គ្មានអភ័យឯកសិទ្ធិឱ្យសងជម្ងឺចិត្ត លោក ហ៊ុន សែន ជាប្រាក់ 4៥00ដុល្លារ ពីបទបរិហាកេរ្ដិ៍ - ក្នុង លិខិតដែលអ្នកស្រីផ្ញើទៅជូនសមាជិកគណបក្ស សម រង្ស៊ី ឯនាយសមុទ្រ លោកស្រីបានវាយតម្លៃថា ការកាត់ទោសគ្មានយុត្តិធម៌ ក្រោមអំណាចនយោបាយ ។ លោកស្រីនឹងបន្តប្ដឹងទៅឧទ្ធរទៀត ៕




# គោលជំហរអ្នកស្នេហាជាតិពិត



*ហ្វីឡាដែលហ្វីយ៉ា, ខ្មែរប៉ុស្ដិ៍, ដោយ : ម៉ម យីន*

មនុស្សរស់នៅលើផែនដី　ទាំងប្រុសទាំងស្រី ក្មេង និងចាស់
តែងតែរស់នៅយ៉ាងជាក់ច្បាស់　មានមេល្អណាស់ទើបបានសុខ ។
ទាំងមេទាំងកូនត្រូវសាមគ្គី　កាយចិត្តជីវីហ៊ានចេញមុខ
អង់អាចក្លាហានការពារស្រុក　ជនជាតិមានទុក្ខត្រូវតែជួយ ។
ឋានៈជាមេត្រូវប្ដេជ្ញា　ដោយចិត្តហានក្លាត្រូវលើកស្ទួយ
គោលជំហររឹងមាំតែ១　ឫផ្ដាច់គ្មានព្រួយ គឺស្នេហ៍ជាតិ ។
គោលជំហររឹងមាំរបស់មេ　បន្តហូរហែរខ្មែរច្រើនទៀត
គ្រប់គ្នារួមដៃចិត្តមិនឃ្លាត　ចេញមកព្រោងព្រាតខ្មែរតែមួយ ។
ជំហរជាតិខ្មែរ ស្នេហ៍ជាតិពិត　ជាតិខ្មែរបានស្ថិតសុខអស់ព្រួយ
នៅមានទុក្ខខ្មែរតែងជួយ　ព្រោះខ្មែរលើកស្ទួយជំហរជាតិ ។
គួរសោកស្ដាយណាស់កាលពីមុន　ខ្មែរធ្លាក់ស៊ីយស៊ុនខ្ទះមាយាទ
មានមេនាំខ្លះចិត្តមិនស្អាត　នាំជាតិខ្មែរឃ្លាតពីគោលដៅ ។
នាំឱ្យជាតិខ្មែរត្រូវវង់ទុក្ខ　ចាកចេញពីស្រុកចោលលំនៅ
ព្រាត់ប្រាស់ញាតិមិត្តជាពូជផៅ　ប្ដីប្រពន្ធកូនចៅសែនវេទនា ។
គួរណាស់មេនាំគួរភ្ញាក់ខ្លួន　មិនត្រូវចោលក្បួនច្បាប់ខេមរា
សុខចិត្តលក់ក្បាលលក់កាយា　លក់ជាតិរដ្ឋាឱ្យទៅខ្មាំង ។
ពេលលក់អស់ហើយបានអំណាច　ប្រព្រឹត្តគ្មានខ្លាចយ៉ាងក្លាខាំង
លើជាតិសាសន៍ឯងណាប្រឆាំង　មិនត្រូវរារាំងចិត្តអញឡើយ ។
ពេលមេឡើងធំមានអំណាច　លោកមិនត្រូវខ្លាចមិនបណ្ដោយ
ជាតិខ្មែរណា១ចង់ធ្វើឱ្យ　អញធ្លាក់អន់ខ្សោយទៅបានទេ ។
មេនៅកោងកាចបាចចិត្តក្ដៅ　ព្រៃផ្សៃឃោរឃៅគ្មានប្រួលប្រែ
គ្មានគោរពសោះជីវិតខ្មែរ　យល់ច្បាស់ស្ថិតស្នេហ៍ជាតិផ្សេងពិត ។
មេរបៀបនេះខ្មែរត្រូវថ្លឹង　ហើយគិតសញ្ជឹងតាមពិនិត្យ
មិនត្រូវបណ្ដោយធ្វើតាមចិត្ត　ជាមេប្រព្រឹត្តតែចិត្តខ្មៅ ។
ជាតិខ្មែរជាជាតិមានកិត្តិយស　ជាតិមានកេរ្ដិ៍ឈ្មោះពូជពង្សផៅ
ជាតិខ្មែរធ្លាប់មានចិត្តត្រឹមត្រូវ　ទុកឱ្យកូនចៅត្រូវចងចាំ ។
ជាតិខ្មែរត្រូវមានគោលជំហរ　ក្រោកឡើងហើយឈរយ៉ាងរឹងមាំ
ជាតិខ្មែរស្នេហ៍ជាតិពិតឧត្ដម　ទុកជាតិជាធំលើសទាំងអស់ ។
ជាតិខ្មែរស្រឡាញ់មេនាំណា　មានចិត្តក្លៀវក្លាហើយស្មោះត្រង់
ជាតិខ្មែរមានគោលជំហរខ្ពស់　ស្នេហ៍ជាតិនាំឆ្ពោះឱ្យរស់សុខ ។
ជាតិខ្មែរសូមតាំងប្ដេជ្ញាចិត្ត　គោលជំហរពិតហ៊ានចេញមុខ
ជាតិខ្មែរស្នេហ៍ជាតិមិនសំកុក　ឱ្យខ្មាំងអុកឡុកតាមមេក្បត់ ។
ជាតិខ្មែរត្រូវហ៊ានដកអំណាច　ពីមេចិត្តកាចហួសកំណត់
ជាតិខ្មែរត្រូវរើសមេបរិសុទ្ធ　មេស្នេហ៍ប្រាកដជាតិខ្មែរអើយ ៕




**ដោយ : គឹម ភឿន** ***(តពីលេខមុន)***

●●●រដូវចូលឆ្នាំជិតមកដល់ទៀត ហើយរដូវបែកក្រហែង រីងស្ងួត បានធ្វើឱ្យស្រុកតាំងគោកកាន់តែក្រៀមក្រោះថែមទៀត ។ ទ័ពព្រៃក៏ស្រួលវាយលុកបោះស្តិប៉មទាំងឡាយរបស់កងទ័ពលោកសេនាប្រមុខ លន់ នល់ ។

លើផ្ទៃប្រទេសសង្គ្រាមផ្ទុះគ្រប់ទីកន្លែង ។ ទីទាំងរបស់កងទ័ពជាតិ ត្រូវបានបោះបង់ចោលកន្លែងខ្លះ ដែលមិនអាចកាន់កាប់តទៅទៀតបាន។ ទឹកដីខេត្តក្រចេះ ធ្លាក់ក្នុងកណ្តាប់ដៃខ្មាំង តាំងពីដំបូងទី រតនគីរី មណ្ឌលគីរី បន្តបន្ទាប់គ្នាចាញ់ដៃសត្រូវ ។ ខ្មាំងមានបំណងធ្វើឱ្យឯកោទីក្រុងភ្នំពេញ ដោយការកាត់ផ្តាច់ផ្លូវទៅកាន់ខេត្តខ័ណ្ឌនានា ដូចជាផ្លូវជាតិលេខ៤ ទៅកាន់ក្រុងព្រះសីហនុ ផ្លូវកំពង់ធំ សៀមរាប ក៏ត្រូវកាត់ផ្តាច់រឿយៗ កម្លោះ វិរៈ ត្រូវបានទៅកាន់នៅទឹកដីតាំងគោក ក្នុងប្រតិបត្តិការសិកចេនឡា ។ សង្គ្រាមស៊ីសាច់ហុតឈាមខ្មែរគ្នាឯង ដោយមានអ្នកនៅពីក្រោយខ្នងជាសត្រូវសួរពូជរបស់ដូនតានៃខ្មែរទាំងពីក្រុម ។ នេះជាអន្ទាក់ដែលដូនតាយើង តែងតែត្រូវបានគេប៉ុនប៉ងដាក់ឱ្យបែកបាក់សាមគ្គីភាពជាតិខ្មែរ ។ ម្លេះសមនឹងចំរៀងបំពេរកូនរបស់ខ្មែរកម្ពុជាក្រោម មានតាំងពីសម័យណាមកថា :

កូនអើយកូនម៉ែនាងកុំយំ !
ទម្រាំកូនធំបាវាស់ដី
តាគុយមរណាព្រោះទឹកដី
ជនក្បត់ឱ្យដៃខ្មាំងសត្រូវ ។
ឈើផ្សាខ្លាំងណាស់លរឿង " តែអុង "
ខ្មែរបានបាត់បង់គ្មានសល់អី
មេអ្នកក្លាហានត្រូវប្រល័យ
ខ្មាំងផុតឱ្យខ្មែរខ្មែរទាំងឡឹម(1) ។
ចូលចាំរឿងនេះបាកុំភ្លេច
បន្តភារកិច្ចកុំភ័ន្តភាំង
កុំយកជាមិត្តអាពួកខ្មាំង
វាលាក់បំបាំងសារជាតិឈ្លើង ! ។

បទចំរៀងបំពេរកូននេះ មិនបានជាមេរៀនសម្រាប់ខ្មែរគ្រប់រូបទេ ។ អ្នកដឹកនាំរបស់ខ្មែរដើរចូលអន្ទាក់ខ្មាំងគ្រប់ជំនាន់កាល សម្លាប់បំផ្លាញគ្នាឯងសឹងគ្រប់ជំនាន់កាលដែរ ។ សតិសម្បជញ្ញៈរបស់អ្នកដឹកនាំខ្មែរ ពុំបានគ្រប់វាងវៃគេចឱ្យផុតពីអន្ទាក់របស់គេ ។ អ្នកទទួលវាសនាអាក្រក់ គឺខ្មែរស្លូតត្រង់ទាំងមួយនគរ ។ បើគ្មានអ្នកឈ្លាសវៃរំដោះបានទេ នេះគឺជាឱកាសចាប់ផ្តើមនៃខ្មោះឃ្លាងបញ្ចូលមកលើស្មាខ្មែរ គ្មានថ្ងៃកំណត់ឡើយ ។ ហើយវាសនាខ្មែរ ចេះតែត្រូវខាតបង់ជាបន្តបន្ទាប់នូវអ្វីដែលខ្លួនមាន ហើយមិត្តដ៏ល្អរបស់ខ្លួនប្រាថ្នាចង់បានរបស់មិត្តខ្លួនគ្មានទីកំណត់... ។

កម្លោះ វិរៈ ចេះតែស្រមៃគិតដល់វាសនាទឹកដីរបស់ខ្លួន ចិត្តទុក្ខព្រួយក្តុកក្តួល ស្តាយស្រណោះ ចេះតែមកធ្វើឱ្យកម្លោះគិត ដែលរកច្រកចេញពុំឃើញ ។ ស្រាប់តែភ្លើងហ្វាបាញ់ពីដី ហើយធ្លាក់មកតាមឆ័ត្រយោងរបស់វាយ៉ាងយឺតៗ ធ្វើឱ្យភាពងងឹតនៃយប់រដូវរនោច បានភ្លឺច្បាស់ឡើងអាចមើលឃើញតាំងពីអង្កត់ឈើដើមស្នោទាំងឡាយយ៉ាងច្បាស់ ធ្វើឱ្យសត្រូវលួនចូលមកប៉ុនប៉ងវាយប្រហារបន្ទាយជម្រំរបស់កងទ័ពជាតិមិនអាចលាក់ខ្លួនបានរួលឡើយ ។ ហេតុការណ៍នេះ បានភាញស្មារតីឱ្យកម្លោះ វិរៈ មកកាន់ភាពបច្ចុប្បន្នរបស់ខ្លួន គឺបច្ចុប្បន្នដែលគេកំពុងដើរសង្កេតតាម " បួយយ៉ូ " (លេនដ្ឋានខ្ទាត់ខ្វែងក្នុងបន្ទាយសម្រាប់ដើរល្បាត កុំឱ្យសត្រូវតម្រង់បាញ់ដោយស្រួលបាន) ។ ការល្បាតនេះ ជួយពង្រឹងស្មារតីរបស់ថ្នាក់ក្រោម កុំឱ្យធ្វេសប្រហែសផង និងឱ្យពួកគេឃើញថា ថ្នាក់លើមានការហត់នឿយ និងប្រុងប្រយ័ត្នដូចពួកគេដែរ មិនបណ្តោយឱ្យថ្នាក់ក្រោមនឿយហត់តែឯកឡើយ ។ យូរៗគេឮសម្លេងផ្ទុះ នៅចុងម្ខាងនៃបន្ទាយក្បែរជើងព្រៃ ។ អ្នកកម្លោះ និងក្រុមរបស់ខ្លួនតម្រង់ទៅទិសដៅនៃសម្លេងផ្ទុះ ។ មួយសន្ទុះក្រោយមកគេបានទៅដល់ចុងម្ខាងនៃបន្ទាយ ។ ក្រុមអ្នកល្បាតរាយការណ៍ភ្លាមៈ " ជំរាបលោកអនុសេនីយឯក មានស្រមោលខ្មៅលួនចូលមក យើងខ្ញុំបាញ់សន្ធាប់ស្រមោលខ្មៅនោះ ធ្វើឱ្យស្រមោលខ្មៅនោះនៅស្ងៀមមួយកន្លែង រហូតដល់ភ្លឺ ហ្វារលត់យើងមើលស្រមោលខ្មៅនោះមិនច្បាស់ទៀត " ។

មួយសន្ទុះក្រោយមក ខ្ញុំឱ្យគេបាញ់ភ្លើងហ្វាមួយទៀត ចាំខំសង្កេតថា ស្រមោសខ្មៅនោះនៅដដែល បួចលនាទៅបាត់ហើយ ។

**(សូមរង់ចាំអានភាគបន្ត)**



# ត្រៀមកែសម្ផស្សតំបន់ " ឡូហ្គាន់អលនី "

**ហ្វីឡាដែលហ្វីយ៉ា, ដោយ : នារី គិត**

●●●ដើម្បីសម្តែងនូវចំណងមិត្តភាពក្នុងសហគមន៍ខ្មែរ ជាមួយសហគមន៍ដទៃឯទៀតនៅហ្វីឡាដែលហ្វីយ៉ា កម្មវិធីតាំងពិពណ៌នៅផ្លូវ "អូលយ៉ក " ខាងជើង នឹងត្រូវរៀបចំឡើង, ផ្តើមគំនិតដោយ Pacific Rim , នៅថ្ងៃទី ៣ ខែតុលា ឆ្នាំ ២០០៩ ។ តំណាងសហគមន៍នានាចំនួនជាង ៣៣ក្រុម បានបង្ហាញសេចក្តីរីករាយ និងចូលរួមធ្វើពិធីតាំងពិពណ៌សង្គមមួយនេះ បានឱ្យជោគជ័យ... គឺជោគជ័យសម្រាប់ភាតរភាព សម្រាប់កែសម្ផស្សក្នុងភូមិ សម្រាប់សន្តិសុខ សម្រាប់ការអប់រំក្នុងគ្រួសារ ។ល។ នារី គិត ធ្វើការនៅផ្លូវ "អូលយ៉ក" បានចូលរួមយោបល់របស់នាងយ៉ាងនេះថា :

**Philadelphia**

**By Nary Kith**



in the past ten years, the city of Philadelphia has been known for its crime, it´s´ ghettos´, its´not-so-brotherly love mentality and behaviors. Philadelphians have forgotten the beauty, the compassion and the opportunities that this city can offer. Times have changed and people are no longer leaving their front doors unlocked. I challenge you to find someone today who says they are comfortable leaving their front doors unlocked and i´ll tell you that they probably recently moved to the city or that their naiveté clouds their view of the real world. People are wearier about how they interact with other people for fear that they would meet their untimely demise. if Philadelphians continue to allow hate and envy to control their behaviors, we may never become the wonderful city that embodies the phrase, " the city of brotherly love ".

To make any change, we must want to see change then put our plan into action so that we are no longer famous for our crime rates. The Pacific Rim Resource Center (PRRC) locate in the heart of the logan community in Philadelphia has begun to make a change that could possicly impact all the communities in phila-delphia. PRRC opened its door on September 2007 to serve the underserve, the Asain American population, with basic case management that led to much, much more. On Saturday, October 3, 2009 from 12pm-4pm, PRRC along with many other social, medical, and behavioral health agencies will come together to raise awareness about available resources while also celebrating the culture that is located in logan. The event titled, " Building Bridges : Celebrating the Richness of Diversity in logan " will be held outdoors on the 4900 block of Old York Road to start the positive change tha Philadelphia so desperately needs. The hope is the people of that community can sustain financial, emotional and mental stability. The hope is to encourage this community to become a neighborhood and develop positive relationships. Finally the hope is to show to other communities that Philadelphia is still beautifull.

# Sense of Relief

An Idyllic Setting and Centuries-Old Sculptures Make The Hike up to Kbal Spean a ReMarding Experience



BY PAUL VRIEZE
THE CAMBODIA DAILY

SIEM REAP PROVINCE - It is quiet in the "valley of a 1,000 lingas" in the western Kulen Mountains. Only the sound of insects fills the air, while a few tourists slowly make their way up along the Kbal Spean River on a meandering jungle trail.

On the mountain slope, located 12 km north of the famous Banteay Srei temple, visitors can make the short trek up to Kbal Spean, or "Headwater Bridge," a natural stone bridge on the upper reaches of the river where hundreds of lingas and glyphs from Hindu mythology have been carved into a 150-meter stretch of riverbed.

The 1,400-meter ascent to the carvings, over a sandy path winding through the forested slopes, is full of natural beauty and offers an appealing alternative to those suffering from "temple fatigue" after days of visiting Angkor.

Rediscovered only in 1968 by Jean Boulbet, a French researcher from the Ecole Francaise d'Extreme-Orient, the 11th to 13th century carvings in the riverbed and just above the waterline are fairly intricate and remarkably well preserved after hundreds of years of water flow.

The carvings show the religious importance of the Kulen mountains to ancient Angkor. The reliefs and rectangular fields of hubbed lingas—a symbol of Hindu deity Shiva—were believed to sanctify the water, which flows into the Siem Reap River that runs through the Angkor area and feeds its water reservoirs and surrounding rice fields.

The path to the water is full of rock formations, but the incline is not very steep, and wooden stair-steepest parts of the trail. Depending on the fitness of the visitor, it might take between ome-and-a-half and two hours to complete the climb.

Along the way there is a small waterfall, while there are also some great views of the valley below. At the end of track, at Kbal Spean, the river rushes spectacularly past two intricate cases have been built at the carvings of a reclining Vishnu, one of the gods of the Hindu trinity, dreaming the cosmos into being.

The trip from Siem Reap town to Kbal Spean takes around 1.5 hours by tuk-tuk and has become more comfortable and quicker since National Road 64 to Anlong Veng was completed last year.

## Advertising...

"Some people think that if they have a good products and good service they can build up reputations and they think that is good enough," he said, adding that such businesses could face problems if they don't change their minds.

Even with the infusion of ad dollars from telecoms, some of the mobile providers have not moved beyond basic name recognition in their campaigns, said Mervyn Cheo, CEO of Phibious advertising firm.

Some ads merely show "happy Cambodians smiling, holding a phone. What's the difference? There doesn't seem to be much effort on the marketing side to differentiate themselves," he said.

Some are only focusing on promotions, not building brands or using aspects of Cambodian culture to attract brand loyalty, he said.

"I think the market will be forced to try to be a lot more creative," he said.

Syed Azmeer, chief marketing officer for Telekom Malaysia International Cambodia, which owns the Hello Point mobile phone network, said his company is trying to be creative and doesn't show mobile phones in its ads so that it can convey a broader message of communication.

"There are nine players, so the message has to stand out," he said, referring to the number of mobile phone service providers in Cambodia.

# 23 Arrested While Protesting Poipet Evictions Released

BY KUCH NAREN
THE CAMBODIA DAILY

Twenty-three villagers, including nine women, held in pretrial detention for allegedly assaulting police and military police with cans and other refuse in order to contest the eviction of six families living in Poipet, were released on bail Thursday, court officials and right workers said.

Two local NGO workers, who were also charged with attempted murder, arson, incitement and international property damage, were previously released on bail on July 25, though one NGO worker remains in custody.

"I have received the court's order to release a total of 26 people on bail," Nuon Vanna, Banteay Meanchey provincial prison director, said Friday.

"I only know that they [the 26 people currently on bail] are still under the court's control and they must present themselves at court any time the court wants to question them," said Mr Vanna.

On July 22, police arrested Mom Pich and Bon Ra, who were subsequently charged with illegally selling land belonging to Touch Sovan Phally, a businessman in Poipet. Their arrest came just two days before the six families were due to be evicted from the contested land. Both are still imprisoned.

A third party allegedly involved in the sale is still at large.

On July 25, villagers attempted to block police from carrying out the court-ordered conviction. Twenty-eight were arrested during the protest, only three of whom remain in prison: Ly Keang, a local tailor, Kong Rithy, commune councilor for the SRP, and Mum Vuthy, director of Banteay Meanchey-based NGO Independent Democracy of Informal Economic Association, or IDEA.

Chea Sokun, secretary general for IDEA, said that the court had charged three of the NGO's staff.

"I am hiding myself as well because I received a report that police are looking to arrest me," said Mr Sokun.

"The continuous detention of my superior, Mam Vuthy, discourages my organization from carrying out rights advocacy aid," he added.

Soum Chankea, provincial coordinator for local rights group Adhoc, said Friday that all the people arrested during Friday's protest should be released, and appealed to court officials to drop all charges.

But Judge Sim Kuch said that the only reason 26 people had thus far been released on bail was because they had confessed to their crimes. Mr Kuch also said that court officials were considering whether they could drop some of the charges, excluding those against Mom Pich.

"For the three [remaining] inmates arrested Friday, they can be released on bail when they confess," he said, adding that Mom Pich would go on trial "soon."

(តមកពីទំព័រទី ០១)

## ជំរឿនប្រជាជនសហរដ្ឋអាមេរិក...

ផ្លូវ " ប្រដ " ខាងជើង កាលពីថ្ងៃពុធ ទី២៩ នេះ ដើម្បីពន្យល់ និងលើកទឹកចិត្តឱ្យ ប្រជាជននាំគ្នាចូលរួមបំពេញឈ្មោះឱ្យបានគ្រប់ៗគ្នា ។

អ្នកស្រី ខង និយាយថា : ការជំរឿនប្រជាជននេះ មានសារៈសំខាន់ណាស់ ដោយរៀងរាល់ ១០ឆ្នាំម្តង អ្នកគ្រប់គ្រងសហរដ្ឋអាមេរិក ត្រូវតែដឹងឱ្យបានច្បាស់ថា ប្រជាពលរដ្ឋទាំងអស់មានប៉ុន្មាននាក់? រស់នៅទីណាខ្លះ? អាយុប៉ុន្មាន? ជាតិសាសន៍អ្វីខ្លះ ? ។ល។ ដើម្បីចែកធនធានពីរដ្ឋទៅប្រជាជនឱ្យបានស្មើគ្នា ឧទាហរណ៍ នៅផែនស៊ីវេនា នេះមានពលរដ្ឋដល់ទៅ ៣០% ដែលពុំបានចូលឈ្មោះទៅក្នុងជំរឿន CENSUS ឆ្នាំ ២000 ដូច្នេះនៅរដ្ឋនេះ ធនធានដែលត្រូវចែកបញ្ជូនមកត្រូវបង់ខាត ដោយពលរដ្ឋប្រ-មាណ ២០ម៉ឺននាក់ ពុំបានបំពេញឈ្មោះក្នុងជំរឿន ។ ដូច្នេះ ពន្ធដាក្នុងរដ្ឋត្រូវឡើងថ្លៃ ព្រោះប្រាក់ចំណូលសម្រាប់ជួយសាលារៀន ជួយធ្វើផ្លូវជួយមនុស្សចាស់ ត្រូវបានកាត់បន្ថយក្នុងរយៈពេល១០ឆ្នាំមុននោះ ។

អ្នកស្រី គ្រេស ខង បានបន្តថា សូមឱ្យពលរដ្ឋទាំងអស់ ទាំងមករស់នៅស្របច្បាប់ ឬ មិនស្របមាន ឬ ក្រ ទទួលប្រាក់ជំនួយរដ្ឋ ឬ គ្មាន កុំឱ្យភ័យខ្លាចដោយប្រការណាមួយ នឹងបំពេញលិខិតជំរឿនប្រជាជននោះ ពីព្រោះអង្គការ ២០១០ CENSUS ធានាការសម្ងាត់ពីព័ត៌មានដែលទទួលបាននោះ យ៉ាងពិតប្រាកដមិនចែករំលែកព័ត៌មានរបស់លោកអ្នកទៅឱ្យអង្គការរដ្ឋពាក់កណ្តាលរដ្ឋណាផ្សេងមួយឡើយ ។

លិខិតដែលមានអាស័យដ្ឋាន តែឥតឈ្មោះ នឹងមកដល់អាស័យដ្ឋានលោកអ្នក នៅខែកុម្ភៈ - មីនា ឆ្នាំ ២០១០ ហើយត្រូវត្រឡប់ទៅការិយាល័យ ២០១០ CENSUS វិញ បន្ទាប់ពីបានបំពេញគ្រប់គ្រាន់ ហើយឱ្យបានមុនថ្ងៃទី១ ខែមេសា ឆ្នាំ២០១០ ។ គឺនៅខែមេសានោះ រហូតដល់ខែកក្កដា ចំពោះអ្នក ដែលពុំទាន់បានបំពេញ ហើយផ្ញើលិខិត CENSUS ទៅឱ្យគេវិញ គេនឹងទៅទារយកលិខិតដែលគេឥតបានទទួលវិញនោះដល់ផ្ទះ ។

សមាជិកនៃក្រុមប្រជុំគាំទ្រគ្រួសារខ្មែរ បានតាំងសំនួរជាច្រើន ដើម្បីឱ្យបានយល់ច្បាស់ ។ លោក ម៉ម យិន បានអំពាវនាវឱ្យខ្មែរយើងបំពេញភារៈកិច្ចជាពលរដ្ឋនេះ ដោយកុំខ្លាចរអារ ដើម្បីនាំធនធានរដ្ឋ មកជួយគ្រួសារ រីឯ ណារី គិត បានសុំអញ្ជើញអ្នកដែលលំបាកបំពេញលិខិត CENSUS ឱ្យមកកាន់ ទីស្នាក់ការ WEDGE គេនឹងជួយបំពេញឱ្យ ៕





...ខ្លឹមចន្ទន៍ក្រស្នាជាប្រភេទឈើដ៏កម្រតាំងពីសម័យបុរាណ ដោយសារវាមានគុណប្រយោជន៍ច្រើនយ៉ាង ហើយត្រូវបានគេទិញយកទៅច្នៃធ្វើជាគ្រឿងសម្អាងតុបតែងកាយបុរស-ស្ត្រី និងសម្រាប់យកទៅផ្សំធ្វើជាឱសថព្យាបាលរោគទៀតផង ។

# ដើមខ្លឹមចន្ទន៍ក្រស្នាមានហាងឆេងខ្ពស់

តាកែវ, ខ្មែរប៉ុស្តិ៍ : ឃុត សីហា

●●●បច្ចុប្បន្ននេះ ដើមចន្ទន៍ក្រស្នាត្រូវបានអ្នកស្រុកធ្វើការដាំដុះនៅខេត្តតាកែវយ៉ាងច្រើន ហើយបន្ទាប់ពីដាំមានខ្លឹមហើយ ឈ្មួញដើរទិញដល់ផ្ទះ ព្រមទាំងមានហាងឆេងខ្ពស់ ទៀតផង ។

ដោយសារតែខ្លឹមចន្ទន៍ក្រស្នាមានគុណប្រយោជន៍ពួកឈ្មួញបានដើរទិញពីអ្នកស្រុក គ្រប់ទីកន្លែងយកទៅលក់នៅក្រៅប្រទេសក្នុងតម្លៃខ្ពស់ ដែលធ្វើឱ្យអ្នកស្រុកដែលមានធនធានក៏ងាកមកដាំប្រភេទឈើនេះវិញ ។

លោក ប៉ែង សាង កសិករនៅភូមិចម្ការអង្គ ឃុំកូស ស្រុកត្រាំកក់ បានឱ្យដឹងថា គាត់បានទិញកូនចន្ទន៍ក្រស្នានេះពីក្រុងសីហនុ ប្រមាណ 5000ដើម ដែលនៅក្នុងមួយដើមតម្លៃ1500រៀល ។ ការដាំដុះគាត់ ដាំពីដំបូងជាមួយនឹងដំណាំស្វាយ ល្ហុងដែរ ប៉ុន្តែដល់វាធំក៏កាប់ដើមឈើផ្សេងចេញ គឺខ្លាចឱ្យវាសង្កត់ដើមចន្ទន៍ក្រស្នា ។

លោក ប៉ែង សាង បន្តថា ពេលនេះដើមចន្ទន៍ក្រស្នាវាមានអាយុ5ឆ្នាំហើយ លុះត្រាតែមានអាយុ10ឆ្នាំទើបវាឱ្យផល បើតាមលោកដឹងក្នុង1ដើមតម្លៃចាប់ពី100ទៅ200 ដុល្លារ ។ លោកសង្ឃឹមថា ដើមចន្ទន៍ក្រស្នា នឹងឱ្យផលដល់ក្រុមគ្រួសារគាត់ច្រើននៅពេលអនាគតមិនខានឡើយ ។

ចំណែកអ្នកស្រី យ៉ុន ម៉េន រស់នៅភូមិចម្ការអង្គ ឃុំគូស ស្រុកត្រាំកក់ បានឱ្យដឹងថា ការដាំដុះដើមចន្ទន៍ក្រស្នានេះវាមិនសូវលំបាកទេ ប៉ុន្តែយើងត្រូវចំណាយពេលវេលាថែទាំឱ្យបានយូរ និងចំណាយលុយអស់ច្រើនទើបទាញផលពីវាមកវិញ ។ ស្រុកយើងដាំដល់វាមានអាយុ10ឆ្នាំទើបមានខ្លឹមឈ្មួញដើរមកទិញអស់ហើយ ។

អ្នកស្រី យ៉ុន ម៉េន បន្តថា បើនៅបរទេសតាមលោកដឹង គឺគេមិនកាប់ដើមវាចេញទេ គឺគេយកដែកស្វាងយកជ័រ ចេញក្លាយជាខ្លឹមចន្ទន៍មានក្លិនក្រអូបខ្លាំងណាស់


ចម្ការដើមចន្ទន៍ក្រស្នា


ដើមចន្ទន៍ក្រស្នា

បើសិន និយាយពីតម្លៃវាឡើងលឿន ជាងមាសទៅទៀត ។

ជាពិសេសនោះ វាក្លាយជាទំនិញឧស្សាហកម្មដ៏មានតម្លៃដែលពួកឈ្មួញបរទេសទិញយកទៅផលិតជាគ្រឿងសម្អាងកាយ ប្រេងរំអិល និងជាឱសថជាច្រើនមុខសម្រាប់យកទៅព្យាបាលរោគទៀតផង ។

គួរបញ្ជាក់ថា ដើមចន្ទន៍ក្រស្នានេះអ្នកស្រុកធ្លាប់ឮតែក្នុងរឿងព្រេងនិទានជាច្រើន សតវត្សមកហើយ ប៉ុន្តែសព្វថ្ងៃនេះត្រូវបានអ្នកស្រុករស់នៅខេត្តតាកែវ កោះកុង រតនគិរី មណ្ឌលគិរី ដាំតាមចម្ការសម្រាប់ដោះស្រាយជីវភាពកាន់តែច្រើនឡើងហើយ ៕

# នយោបាយកំពុងរុញច្រាន សេង ធារី ចេញពី CSD

**ភ្នំពេញ, ខ្មែរប៉ុស្តិ៍ : ចាន់ កុសល**

●●●កញ្ញា សេង ធារី អតីតនាយិកាមជ្ឈមណ្ឌលអភិវឌ្ឍន៍សង្គម ដែលមានឈ្មោះលេចធ្លោជាងគេក្នុងចំណោមអង្គការសង្គមស៊ីវិលនានាត្រូវបានប្រធានក្រុមប្រឹក្សាភិបាលចាស់ដាក់ពាក្យបណ្តឹងទៅតុលាការដើម្បីបណ្តេញនាយិកាប្រតិបត្តិរូបនេះចេញពីតំណែងស្របពេល ដែលនាងមានបេសកកម្មចាកចេញទៅក្រៅប្រទេសនោះ ។

ការសម្រេចរបស់តុលាការក្រុងភ្នំពេញ ឱ្យអតីតក្រុមប្រឹក្សាភិបាលមានតែឈ្មោះនេះ ឈ្នះត្រូវបានអង្គការ សមាគមក្នុងស្រុក មានការចាប់អារម្មណ៍ ហើយខ្លាចករណីបែបនេះ រីករាលដាលដល់ស្ថាប័នរបស់ខ្លួន ។ ករណីបណ្តេញ កញ្ញា សេង ធារី ចេញពីតំណែងនេះ ត្រូវបានអ្នកវិភាគឯករាជ្យខ្លះថា "នយោបាយកំពុងជ្រៀតជ្រែកក្នុងស្ថាប័នអង្គការសង្គម ស៊ីវិលទៀតហើយ" ។

លោក វី ហ៊ុយ អតីតប្រធានក្រុមប្រឹក្សាភិបាលផុតអាណត្តិ និងជាដើមបណ្តឹងបានប្រាប់អ្នកសារព័ត៌មាននៅទីស្នាក់ការកណ្តាលក្រុងភ្នំពេញថា កញ្ញា សេង ធារី ជានាយិកាប្រតិបត្តិមជ្ឈមណ្ឌលដើម្បីអភិវឌ្ឍន៍សង្គម ដែលត្រូវបានតែងតាំងកាលពីឆ្នាំ 2006 នោះ ត្រូវបានគេដកចេញពីតំណែងដោយសារតែលោកលើសេចក្តីទុកចិត្ត ។

លោក វី ហ៊ុយ បន្តថា ការងារកន្លងមក កញ្ញា សេង ធារី មិនបានពិគ្រោះយោបល់ជាមួយក្រុមប្រឹក្សាភិបាលចាស់ទេ ហើយបានព្យាយាមបណ្តេញពួកគេចាស់ៗចេញ និងបង្កើតក្រុមប្រឹក្សាភិបាលថ្មីទៅវិញ ។

មជ្ឈមណ្ឌលអភិវឌ្ឍន៍សង្គមនេះ ត្រូវបានបង្កើតឡើងតាំងពីឆ្នាំ១៩៩៥មានឈ្មោះល្បីល្បាញដោយសារតែអង្គការនេះ មានភាពប៉ិនប្រសប់ក្នុងការស៊ើបអង្កេតនៅក្នុងប្រព័ន្ធតុលាការក្នុងស្រុក និងសាលាក្តីខ្មែរក្រហម ។

ជម្លោះផ្ទៃក្នុងនៃអង្គការនេះបានចាប់ផ្តើមតាំងពីខែមិថុនា ឆ្នាំ2008 ខណៈដែលក្រុមប្រឹក្សាភិបាលចាស់ៗបានប្រកាសដក កញ្ញា សេង ធារី ពីតំណែងប្រធានដោយសារតែខ្វះការទំនាក់ទំនងជាមួយពួកគេ ។

កញ្ញា សេង ធារី បានអះអាងថា ក្រុមប្រឹក្សាភិបាលនេះ ត្រូវបានគេរំលាយចោលរួចទៅហើយ និងបានជំនួសដោយក្រុមប្រឹក្សាភិបាលថ្មីចំនួន11 នាក់ថ្មី មុននឹងមានពាក្យបណ្តឹងនេះទៅទៀត ។

អតីតនាយិកាមជ្ឈមណ្ឌល អភិវឌ្ឍន៍សង្គម បានបញ្ជាក់ថា ពេលនេះខ្ញុំបានដាក់លិខិតសម្អាងចូលតុលាការហើយ ករណីនេះវាផ្តើមចេញពីរឿងបុគ្គល ហើយខ្ញុំសង្ស័យទៅលើនយោបាយមកជ្រៀតជ្រែកយាយី ។ ជាពិសេស វាគ្មានមូលដ្ឋានសម្រាប់អនុវត្តមកលើរូបខ្ញុំនោះទេ ពីព្រោះរដ្ឋមន្ត្រីក្រសួងមហាផ្ទៃដែលចុះហត្ថលេខាដោយលោក ស ខេង បានផ្តល់សិទ្ធិឱ្យខ្ញុំជាអ្នកគ្រប់គ្រងនិងមានសិទ្ធិសម្រេចកិច្ចការក្នុងអង្គការទាំងក្រុមប្រឹក្សាភិបាលថ្មីក៏ដូចគ្នាដែរ ។

កញ្ញា សេង ធារី បន្តថា ករណីនេះតុលាការពិតជាបានចូលដៃចូលក្នុងរឿងរបស់យើងខ្ញុំទាំងគ្មាននីតិវិធី ពេលនេះយើងកំពុងធ្វើការស្រាវជ្រាវនិងចង់ដឹងថា នយោបាយជ្រៀតជ្រែកចូលកម្រិតណា ? តុលាការលូកដៃកម្រិតណា ? ទោះបីជាយ៉ាងណាខ្ញុំសង្ឃឹមថា រឿងនេះអាចមានដំណោះស្រាយជាក់ជាមិនខាន ។


កញ្ញា សេង ធារី អតីតនាយិកាមជ្ឈមណ្ឌលអភិវឌ្ឍន៍សង្គម

លោក អាង ឧត្តម មេធាវីរបស់កញ្ញា សេង ធារី បានប្រាប់ The Cambodia Daily ថាទោះ បីជាតុលាការបានសម្រេចរឿងក្តីនេះ យ៉ាងណាក្តីក៏បណ្តឹងរបស់លោក វី ហ៊ុយ គ្មានមូលដ្ឋានដែរ ព្រោះពួកគេលែងមានតួនាទីជាមួយអង្គការទៀតហើយ ។

លោក អាង ឧត្តម បន្តថា អាណត្តិរបស់លោក វី ហ៊ុយ បានចប់ហើយ គឺមុនមានបណ្តឹងនេះទៅទៀត ។ ពេលនេះកូនក្តីរបស់លោកបានដាក់ពាក្យបណ្តឹងទៅសាលាឧទ្ធរណ៍ ដើម្បីបញ្ចប់អធិករណ៍ និងអាចប្តឹងប្រឆាំងចំពោះអ្នកព្យាយាមគ្រប់គ្រងអង្គការនេះថែមទៀត ។

អង្គការសង្គម ស៊ីវិល ចំនួន21បានហៅចំណាត់ការរបស់តុលាការលើ កញ្ញា សេង ធារី ជារឿងរសើបសម្រាប់ពួកគេ ហើយពួកគេរកវិធីដោះស្រាយផ្សេងៗ បើមានរឿងបែបនេះ សូមកុំឱ្យតុលាការលូកដៃឱ្យសោះ ។ ជាពិសេស គណៈកម្មាធិការប្រព្រឹត្តិកម្មនោះ បានដកបេក្ខភាពមជ្ឈមណ្ឌលអភិវឌ្ឍន៍សង្គមចេញពីសមាជិកគន្លឹះឱ្យមកត្រឹមជាសមាជិកធម្មតា ។

បើតាមអ្នកស្និទ្ធនឹងកញ្ញា សេង ធារី បានឱ្យដឹងថា ចាប់តាំងពីតុលាការលូកដៃចូលក្នុងជម្លោះនេះរួចមកបុគ្គលិកមួយភាគធំអស់ទឹកចិត្តធ្វើការងារហើយ ពីព្រោះតែការបណ្តេញនាយិការបស់ខ្លួនទាំងគ្មានកំហុស ។ ចំណែកឯម្ចាស់ផ្ទះដែលជួលឱ្យអង្គការ ក៏រករឿងទារថ្លៃឈ្នួលដែរ ហើយក៏ចង់រុះរើឈប់ឱ្យជួលបន្តទៀតដែរ ។

ប្រភពខាងលើបន្តថា ក្នុងស្ថានភាពមិនច្បាស់លាស់នេះ ម្ចាស់ជំនួយ3ក្នុងចំណោមម្ចាស់ជំនួយចំនួន6 ដែលបានផ្តល់លុយដល់មជ្ឈមណ្ឌលអភិ-វឌ្ឍន៍សង្គមបានផ្អាកឈប់ផ្តល់ជំនួយតែម្តង ។ ចំណែកម្ចាស់ជំនួយ3ទៀតនោះស្ថិតក្នុងចិត្តអល់ឯកទំនងជាចង់ផ្តាច់ជំនួយដែរ ហើយមើលទៅដោយសារការចង់បានអំណាចរបស់ក្រុមប្រឹក្សា-ភិបាលចាស់ខុសទំនង ។

ប្រភពខាងលើក៏បានអះអាងថា ការដែលប្រធានក្រុមប្រឹក្សាចាស់អស់អាណត្តិហ៊ានលូកដៃបែបនេះទំនងជាមានអ្នកនយោបាយនៅពីក្រោយខ្នង ដោយសារជាញឹកញាប់កញ្ញា សេង ធារី តែងរិះគន់ដល់ប្រព័ន្ធតុលាការនៅកម្ពុជានិងរិះគន់ចំពោះនាយករដ្ឋមន្ត្រី ហ៊ុន សែន ក្នុងការលូកលាន់ដល់ការងារសាលាក្តីខ្មែរក្រហមស្តីពីការជំទាស់នាំខ្លួនជនសង្ស័យបន្ថែមមកកាត់ទោស ៕ បញ្ហានេះនឹងកើតមានចំពោះអង្គការផ្សេងទៀតមិនខានឡើយ ប្រសិនបើប្រធានអង្គការនោះហ៊ានរិះគន់រដ្ឋាភិបាលដូច សេង ធារី ៕

# HONG KONG SUPERMARKET

## FAMER´S BEST

571 ADAMS AVE.PHILADELPHIA,PA19120
Tel: 215-72801300 Fax: 215-728-1600

**Newly Renovated. Added new section . Clean and Improved management !**

ទើបនិងកែលំអរថ្មីឡើងវិញ -បន្ថែមផ្នែក លក់ថ្មីទៀត ហាងស្អាត ហើយបង្កើន គុណភាព គ្រប់ គ្រង

**Weekly Sale**

លក់ចុះថ្លៃរៀងរាល់សប្តាហ៍

OPEN 7DAY 8:00-9:00

SỮA ÔNG THỌ
$1.79/can

Vinacafe
INSTANT COFFEE MIX
CÀ PHÊ HÒA TAN
三合一即溶咖啡
$2.99/bag

Café Du Monde
AND CHICORY
$3.49/ea

Mazola
CORN OIL
Cholesterol Free
$7.99

Việt Hương
FISH SAUCE
$2.99

$7.99/lb

MAMA
$6.99/box

- ចំណាយ $140ដុល្លារ ទទួលបានអង្ករស្រូវស ២៥ ផោន
- ចំណាយ $100ដុល្លារ ទទួលបានគូវភេសជ្ជៈ : ឬមីកញ្ចប់មួយប្រអប់ (តម្លៃ 8.99 )
- ចំណាយ $25 ដុល្លារទទួលបានទឹកសណ្តែកមួយដប ឬទឹកត្រីមួយដប ។

# Sense of Relief

### An Idyllic Setting and Centuries-Old Sculptures Make The Hike up to Kbal Spean a ReMarding Experience



BY PAUL VRIEZE
THE CAMBODIA DAILY

SIEM REAP PROVINCE - It is quiet in the "valley of a 1,000 lingas" in the western Kulen Mountains. Only the sound of insects fills the air, while a few tourists slowly make their way up along the Kbal Spean River on a meandering jungle trail.

On the mountain slope, located 12 km north of the famous Banteay Srei temple, visitors can make the short trek up to Kbal Spean, or "Headwater Bridge," a natural stone bridge on the upper reaches of the river where hundreds of lingas and glyphs from Hindu mythology have been carved into a 150-meter stretch of riverbed.

The 1,400-meter ascent to the carvings, over a sandy path winding through the forested slopes, is full of natural beauty and offers an appealing alternative to those suffering from "temple fatigue" after days of visiting Angkor.

Rediscovered only in 1968 by Jean Boulbet, a French researcher from the Ecole Francaise d'Extreme-Orient, the 11th to 13th century carvings in the riverbed and just above the waterline are fairly intricate and remarkably well preserved after hundreds of years of water flow.

The carvings show the religious importance of the Kulen mountains to ancient Angkor. The reliefs and rectangular fields of hubbed lingas—a symbol of Hindu deity Shiva—were believed to sanctify the water, which flows into the Siem Reap River that runs through the Angkor area and feeds its water reservoirs and surrounding rice fields.

The path to the water is full of rock formations, but the incline is not very steep, and wooden staircases have been built at the steepest parts of the trail. Depending on the fitness of the visitor, it might take between omeand-a-half and two hours to complete the climb.

Along the way there is a small waterfall, while there are also some great views of the valley below. At the end of track, at Kbal Spean, the river rushes spectacularly past two intricate cases have been built at the carvings of a reclining Vishnu, one of the gods of the Hindu trinity, dreaming the cosmos into being.

The trip from Siem Reap town to Kbal Spean takes around 1.5 hours by tuk-tuk and has become more comfortable and quicker since National Road 64 to Anlong Veng was completed last year.

## Advertising...

"Some people think that if they have a good products and good service they can build up reputations and they think that is good enough," he said, adding that such businesses could face problems if they don't change their minds.

Even with the infusion of ad dollars from telecoms, some of the mobile providers have not moved beyond basic name recognition in their campaigns, said Mervyn Cheo, CEO of Phibious advertising firm.

Some ads merely show "happy Cambodians smiling, holding a phone. What's the difference? There doesn't seem to be much effort on the marketing side to differentiate themselves," he said.

Some are only focusing on promotions, not building brands or using aspects of Cambodian culture to attract brand loyalty, he said.

"I think the market will be forced to try to be a lot more creative," he said.

Syed Azmeer, chief marketing officer for Telekom Malaysia International Cambodia, which owns the Hello Point mobile phone network, said his company is trying to be creative and doesn't show mobile phones in its ads so that it can convey a broader message of communication.

"There are nine players, so the message has to stand out," he said, referring to the number of mobile phone service providers in Cambodia.

# 23 Arrested While Protesting Poipet Evictions Released

BY KUCH NAREN
THE CAMBODIA DAILY

Twenty-three villagers, including nine women, held in pretrial detention for allegedly assaulting police and military police with cans and other refuse in order to contest the eviction of six families living in Poipet, were released on bail Thursday, court officials and right workers said.

Two local NGO workers, who were also charged with attempted murder, arson, incitement and international property damage, were previously released on bail on July 25, though one NGO worker remains in custody.

"I have received the court's order to release a total of 26 people on bail," Nuon Vanna, Banteay Meanchey provincial prison director, said Friday.

"I only know that they [the 26 people currently on bail] are still under the court's control and they must present themselves at court any time the court wants to question them," said Mr Vanna.

On July 22, police arrested Mom Pich and Bon Ra, who were subsequently charged with illegally selling land belonging to Touch Sovan Phally, a businessman in Poipet. Their arrest came just two days before the six families were due to be evicted from the contested land. Both are still imprisoned.

A third party allegedly involved in the sale is still at large.

On July 25, villagers attempted to block police from carrying out the court-ordered conviction. Twenty-eight were arrested during the protest, only three of whom remain in prison: Ly Keang, a local tailor, Kong Rithy, commune councilor for the SRP, and Mum Vuthy, director of Banteay Meanchey-based NGO Independent Democracy of Informal Economic Association, or IDEA.

Chea Sokun, secretary general for IDEA, said that the court had charged three of the NGO's staff.

"I am hiding myself as well because I received a report that police are looking to arrest me," said Mr Sokun.

"The continuous detention of my superior, Mam Vuthy, discourages my organization from carrying out rights advocacy aid," he added.

Soum Chankea, provincial coordinator for local rights group Adhoc, said Friday that all the people arrested during Friday's protest should be released, and appealed to court officials to drop all charges.

But Judge Sim Kuch said that the only reason 26 people had thus far been released on bail was because they had confessed to their crimes. Mr Kuch also said that court officials were considering whether they could drop some of the charges, excluding those against Mom Pich.

"For the three [remaining] inmates arrested Friday, they can be released on bail when they confess," he said, adding that Mom Pich would go on trial "soon."

(តមកពីទំព័រទី ០៤)

# អ្នកមានអ្នកក្រ...

ហើយក៏ក្លាយទៅជា"មីលាន៉ែ"បាន ហើយបានចែកសហគមន៍ខ្មែរជាពីរដាច់គ្នាស្រឡះ ជាសង្គមអ្នកកំណាញ់ស្វះរកទ្រព្យសម្បត្តិ និងសង្គមអ្នកធ្វើបុណ្យធ្វើទាន ដោយសារតែគ្មានអ្នកផ្សះផ្សារ ហើយពន្យល់គ្នាពីវប្បធម៌ថ្មីនៃការចង់មានបាននោះឱ្យទៅជា "វត្ថុចំណូល " ។

ទស្សនៈនៃ"វត្ថុចំណូល" គឺជាការផ្សព្វផ្សាយ ដែលមានលក្ខណៈជាប្រព័ន្ធ ធ្វើឱ្យអ្នកស្តាប់ចូលចិត្តជាប្រចាំដោយជំនឿ ហើយយកទៅប្រតិបត្តិតាម ហើយបានជាផលយ៉ាងដូច្នេះ មែនដូចគ្នានឹង "វត្ថុចំណាយ" ធម្មតា ដែលមនុស្សចំណាយទៅបានសេចក្តីស្ងប់ និងទទួលកុសលផលបុណ្យនៅបរលោកឯណោះ ក៏ជាប្រព័ន្ធមួយដែរ ។ ខ្ញុំបានឃើញភាពចម្លែកថ្មីមួយ ដែលមនុស្សមួយក្រុមជាខ្មែរ និយាយខ្មែរ ហើយលើកទឹកចិត្តគ្នាទៅវិញទៅមកឱ្យនិយាយពីការចង់មាន ដោយធម៌ដោយមិនខ្លាចបាបនៅហ្វីឡាដែលហ្វា នេះជាដំបូងបង្អស់ ។ ក្នុងបណ្តាការពិភាក្សាផ្សព្វផ្សាយជាច្រើននៅវិហារ "មីណូណៃ" គេយកពេល ២ម៉ោងក្នុង ១ខែ ដើម្បីបណ្តុះបណ្តាលចិត្តឱ្យគ្រួសារខ្មែរ មានចំណង់មានបាន ហើយថែមរក្សាទ្រព្យឱ្យបានជាប្រយោជន៍ដល់គ្រួសារ ។

លោក អ៊ូតេង គ្រូកង្វាលបានផ្តល់ឱ្យវេទិកាទៅលោក រឿម ឡុង -លោក ញ៉ូយ ចំរើន លោក ម៉ម យីន ជាអ្នកបង្ហាញទស្សនៈ និងបច្ចេកទេសនៃការសន្សំច្រើនបែបយ៉ាងដល់សាធារណៈជនជាទូទៅ (តែពេលនេះច្រើនជាសមាជិកនៃគណបក្សសិទ្ធិមនុស្ស និងគណបក្ស សម រង្ស៊ី នៃកម្ពុជា ក្នុងបំណងបង្ហាញជម្រៅនៃទស្សនៈមួយថ្មី ទៅកែទស្សនៈចាស់ដ៏ជ្រៅដូចគ្នា តែផ្ទុយគ្នាសម្រាប់លើជីវភាពគ្រួសារខ្មែរនៅសហរដ្ឋអាមេរិកនេះប្រសើរឡើងបាន ក្នុងតំបន់ដែលកូនខ្មែរបោះបង់សាលាក៏ច្រើន គ្រួសាររស់ក្រោមភាពក្រីក្រក៏ច្រើន-ភាពអស់សង្ឃឹមក៏ច្រើន។ វត្ថុចំណូលនេះ ពុំទាន់ក្លាយទៅជាប្រព័ន្ធពិតប្រាកដនៅឡើយទេ ដោយសារធ្វើការក្នុងភាពស្ម័គ្រចិត្ត ហើយនឹងបទពិសោធន៍ ពុំទាន់បានក្លាយទៅជាទ្រឹស្តី ។ ការសាកល្បងនេះបង្ហាញពីការស្វែងរកការក្រោកឈរឱ្យបានរឹងប៉ឹងនៃសហគមន៍មួយដែលគំរូមាននៅជុំវិញខ្លួនយើងស្រាប គួរឱ្យគោរពបាន។

វត្ថុចំណាយ និងវត្ថុចំណូលហាក់ដូចជាផ្ទុយគ្នា តែទាំងពីរនេះ ចេះផ្តល់សេចក្តីថ្លៃថ្នូរដល់មនុស្សដូចគ្នា តែការភ្លេចផ្សព្វផ្សាយរបស់វត្ថុចំណាយថា "មនុស្សមិនអាចធ្វើទានឱ្យលើស ១ ភាគ ៤ នៃប្រាក់ចំណូលទេ ហើយបីភាគទៀតត្រូវទុកសម្រាប់សេចក្តីថ្លៃថ្នូនៃជីវិតរបស់ខ្លួន និងគ្រួសារខ្លួន" ដែលកំពុងធ្វើឱ្យវត្ថុទាំងពីរនេះ ក្លាយទៅជាខុសគ្នា អាចនឹងមានទំនាស់នឹងគ្នាថែមទៀត ។ មកទល់ពេលនេះខ្ញុំមើលឃើញទស្សនៈមានក្រ "នេះថាមានប្រយោជន៍ ហើយប្រើការបានលុះត្រណាតែ ១-ចង់ធ្វើជាអ្នកមាន ២-រកប្រាក់ចំណូលបានដោយធម៌ ឬស្របច្បាប់ ៣-មានជំនឿជាប្រចាំនូវសេចក្តីថ្លៃថ្នូរ និងការព្យាយាម ។ ទស្សនៈរបស់ខ្ញុំសង្ឃឹមថា លោកអ្នកអានមុខជានឹងមានការណែនាំជាមិនខាន ៕




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ដោយ : ពិន សំខុន** ***តពីលេខមុន***

**១៣ មិនា :** សម្តេច សីហនុ ចេញពីទីក្រុងប៉ារីស ទៅកាន់ក្រុងមូស្គូ ។

**១៥ មិនា :** លោក លន់ នល់ សុំជំនួយយោធាពីវៀតណាមខាងត្បូង ។

**១៦ មិនា :** សម្តេច សីហនុ មិនព្រមត្រឡប់មកភ្នំពេញ នៅពេលដែល លោក អ៊ុំ ម៉ាន់នូរិន ជាបងថ្លៃប៉ុនប៉ងចាប់ខ្លួន លោក លន់ នល់ តែមិនបានសម្រេច - មានបាតុកម្មប្រឆាំងវត្តមានយួនយៀកកុងថ្មីៗទៀតកើតឡើង - កិច្ចចរចាបរាជ័យស្តីពីការដកទ័ពយួនកុម្មុយនិស្តចេញពីកម្ពុជា ។

**១៧ មិនា :** លោក អ៊ុំ ម៉ាន់នូរិន បានត្រូវបង្ខំឱ្យលាលែងពីតំណែងជារដ្ឋាភិបាល ហើយឃុំខ្លួននៅគេហដ្ឋានរបស់លោក ។

**១៨ មិនា :** នៅពេលដែលរថក្រោះព័ទ្ធសភាជាតិជុំជិត ហើយទីងយោធាចូលលុកក្នុងទីប្រជុំសភា និងព្រឹទ្ធសភាជាតិ បានបោះឆ្នោតជាសម្ងាត់ក្រោមការគម្រាម - ការបោះឆ្នោតដោយហៅឈ្មោះបានលទ្ធផលជាឯកច្ឆន្ទ គឺដកតួនាទីសម្តេច នរោត្តម សីហនុ ជាព្រះប្រមុខរដ្ឋនៃកម្ពុជា តែងតាំងលោក ចេង ហេង ជាប្រមុខរដ្ឋវិញ - រដ្ឋាភិបាលលោក លន់ នល់ ត្រូវកែប្រែ ។

**( រដ្ឋាភិបាល លន់ នល់ )**

**ប្រមុខរដ្ឋ** : ចេង ហេង ( ពី១៨មីនា ១៩៧០ ដល់១០មីនា១៩៧០ )

: លន់ នល់ ( ពី១៤មីនា ១៩៧២ ដល់ ១មេសា១៩៧៥)

**១-** រដ្ឋាភិបាល លម់ នល់ ( ១៨.៣.១៩៧០-២១.៤.១៩៧៥)

. នាយករដ្ឋមន្ត្រី រដ្ឋមន្ត្រីការពារជាតិ : លន់ នល់

. ឧបនាយករដ្ឋមន្ត្រីទី១ ទទួលបន្ទុកមហាផ្ទៃ អប់រំ និងសំរបសំរួលកិច្ចការសាសនា សណ្តាប់ធ្នាប់សន្តិសុខ និងអប់រំជាតិ : ស៊ីសុវត្ថិ ស៊ីរិមតៈ

. ឧបនាយករដ្ឋមន្ត្រីទី២ ទទួលបន្ទុកយុត្តិធម៌ សំរបសំរួលខាងសាធារណសុខាភិបាលសង្គមកិច្ច ការងារបង្កើនគុណភាពជីវិត អភិវឌ្ឍន៍សហគមន៍ និងលំនៅដ្ឋានជនបទ និងទំនាក់ទំនងជាមួយសមភា រដ្ឋមន្ត្រីការបរទេស : យ៉ែម សំបូរ

**(តទៅលេខក្រោយ)**

# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

**ដោយ : អ៊ុម លឿម**

**(តពីលេខមុន)**

❖រូបភាព និងរឿងដើមជាភាសាថៃដោយ គុណាប៉ាយុតា

❖បកប្រែជាភាសាចិន ដោយភិក្ខុ ជែន ហាយ

❖បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី

❖ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី

❖បកប្រែជាភាសាខ្មែរ ដោយភិក្ខុ គង់ អាំ



❖Original Illuatration and Naration in Thai by Gunapayuta.

❖Translation into Chinese by Bhikkhu Jan Hai.

❖Translation into English by Z.A Lu.

❖ Coloring by Yann Fang Lee

❖Translation into Khmer by Bhikkhu Kong Am.

៣២-នៅពេលបាយថ្ងៃត្រង់ អ្នកមកជាមួយព្រះសិទ្ធត្ថទាំងអស់ទៅជុំគ្នាសប្បាយរីករាយ ក្នុងពិធីបុណ្យទុកឱ្យព្រះអង្គគង់នៅតែមួយព្រះអង្គឯង ។ បានឱកាសល្អដូច្នេះ ព្រះសិទ្ធត្ថទ្រង់យាងដោយព្រះអង្គឯងទៅកាន់ដើមជម្ពូព្រឹកដែលមានម្លប់ត្រឈឹងត្រឈៃ ទ្រង់គង់ចំរើនសមាធិ ទ្រង់តាំងព្រះទ័យយ៉ាងស្ងប់ ដោយកំចាត់បង់នូវចិត្តសៅហ្មង រួចទ្រង់ខំប្រមូលអារម្មណ៍ឱ្យមូលដោយទ្រង់គិតថា "ព្រះមហាក្សត្រ ពួកមន្ត្រី និងកសិករទាំងឡាយមកជួបជុំគ្នានៅទីនេះ ដើម្បីប្រារព្ធពិធីបុណ្យច្រត់ព្រះនង្គ័ល ឥឡូវនេះ ពួកគេកំពុងតែសប្បាយនឹងពិធីបុណ្យនេះ " ។ **នៅមានត**

32- At lunchtime, the atten- dants of Prince Siddhartha all went to enjoy the feast, leaving the Prince Siddhartha walked by himself to the shade of a thriving Jambu tree, sat down, quietly calmed his mind by expelling all its wrong thougts and began to contemplate: "The King, the officials, and the farmers are here to hold the Royal Tiller ceremony, and now they are happily feasting".



**(Continue Issue After)**

## អប់រំកុមារ

# នៅពេលដែលក្មេងៗត្រូវពាក់វ៉ែនតា

•••បញ្ហារឿងកែវភ្នែក មិនមែនកើតមានតែនៅក្នុងក្រុមមនុស្សចាស់ប៉ុណ្ណោះទេ ក៏ប៉ុន្តែមកក្នុងយុគសម័យនេះក៏មានក្មេង ជាច្រើនកើតមានបញ្ហាកែវភ្នែកតាំងពីវ័យកុមារទៅផងដែរ ។

ក្មេងខ្លះមានបញ្ហាខាងកែវភ្នែក រហូតទៅពិគ្រោះជាមួយចក្ខុពេទ្យ ហើយបានទទួលការវិនិច្ឆ័យថា ត្រឹមឱ្យមានការពាក់វ៉ែនតា។ លក្ខណៈបែបនេះឪពុកម្ដាយ ក៏អាចកើតមានបញ្ហាឡើងមកជាមួយដែរថា តើគួរធ្វើបែបណាដើម្បីឱ្យក្មេងទាំងនោះយល់ព្រមពាក់វ៉ែនតា ។

រឿងនេះគ្រូពេទ្យកុមារនៅសហរដ្ឋអាមេរិកបានលើកយកគោលការណ៍ណែនាំគួរឱ្យចាប់អារម្មណ៍ក្នុងការបញ្ឆោតកុមារឱ្យគេព្រមពាក់វ៉ែនតាដូចខាងក្រោមនេះ ។

ជំហានដំបូងគួរឱ្យគេជ្រើសរើសគ្រប់វ៉ែនតា និងគួរមានការសរសើរបញ្ចោរគេថា នាងពាក់វ៉ែនតាបានសមស្អាតស្រស់សង្ហាជាងគេជាងឯង ។

បន្ទាប់មកសាកល្បងឱ្យគេពាក់វ៉ែនតាក្នុងរយៈពេលខ្លី រហូតដល់ក្លាយទៅជាទំលាប់មិនទើសទែងនៅលើផ្ទៃមុខ ។

គួរគាំទ្រឱ្យក្មេងពាក់វ៉ែនតាខណៈពេលដែលគេកំពុងធ្វើអ្វីដោយអារម្មណ៍ភ្លឹកខ្លួនរវល់តែសប្បាយរីករាយដូចជា មើលភាពយន្ត ឬអានសៀវភៅ ។

មិនគួរប្រើពាក្យណាមួយដែលបង្ហាញពីភាពប៉ះពាល់ក្នុងការពាក់វ៉ែនតារបស់គេទេ ផ្ទុយទៅវិញគួរប្រើពាក្យសរសើរជំនួស ។

ការពាក់វ៉ែនតា គឺជាចំណែកមួយនៃកាតព្វកិច្ចប្រចាំថ្ងៃប្រៀបដូចជាការដុសធ្មេញ ឬការតុបតែងកាយយ៉ាងដូច្នោះដែរ ។ ចុងក្រោយធ្វើយ៉ាងណាបង្កើតទំលាប់ឱ្យកុមារថ្លឹកទៅនឹងការពាក់វ៉ែនតានេះឱ្យបានរាល់ថ្ងៃ ទើបគេពុំមានបញ្ហាទៅថ្ងៃក្រោយ ៕

## អប់រំយុវជ័យ



# សន្សំលុយបែបណាពេលវ័យនៅលីវ

•••ស្ថិតនៅក្នុងអំឡុងពេលជីវិតនៅលីវ មិនមែនជាវ័យមួយសប្បាយដើរចាយវាយហ៊ុហា គ្មានការសន្សំប្រាក់ទុកសម្រាប់ជាបង្វេចទុកទៅថ្ងៃក្រោយទេ ។ ជាការពិតស្ថិតនៅក្នុងវ័យនេះ គួរសន្សំប្រាក់កាសទុកខ្លះដើម្បីជីវិតរុងរឿងទៅថ្ងៃអនាគត ។

អ្នកត្រូវចងចាំទុកនូវពាក្យចាស់មួយឃ្លាពោលថា "ខ្លួនជាទីពឹងខ្លួនកុំសង្ឃឹមលើអ្នកដទៃឱ្យសោះ" ក្នុងន័យនេះ គឺអ្នកត្រូវយកឱកាសនេះសន្សំទ្រព្យធនទុកខ្លួនឯង ធ្វើខ្លួនជាអ្នកមានមួយរូបឱ្យហើយទៅទាន់ឱកាសកំពុងហុចឱ្យ ។ តើធ្វើដូចម្ដេចដើម្បីបើកឱកាសឱ្យខ្លួនឯងមានថ្ងៃដ៏អស្ចារ្យទៅថ្ងៃអនាគត ?

នេះវិធីសម្រាប់អ្នកសន្សំប្រាក់ពេលជីវិតនៅលីវ ដោយបែងចែកជាបីផ្នែកនៃប្រាក់ចំណូលដូចខាងក្រោមនេះ :

**ផ្នែកទី១ :** បែងចែក២៥ភាគរយនៃចំណូលទាំងអស់ក្នុងមួយខែ១សម្រាប់ទុកចាយវាយក្នុងពេលបច្ចុប្បន្ន។

**ផ្នែកទី២ :** បែងចែក២៥ភាគរយទៀតសម្រាប់តម្កល់ទុកក្នុងស្ថានការណ៍មានគ្រោះអាសន្ន ដូចជាឧបទ្ទវហេតុ ឬមានជំងឺ...។

**ផ្នែកទី៣ :** បែងចែក៥០ភាគរយនៃចំណូលទាំងនេះ សម្រាប់ត្រៀមទុកក្នុងជីវិតទៅថ្ងៃអនាគត ។

បើអ្នកដាក់គម្រោងខាងលើនេះរួចរាល់ ហើយកុំភ្លេចព្យាយាមអនុវត្តវាឱ្យបានខ្ជាប់ ខ្ជួនផង ៕

# ហោរាសាស្ត្រប្រចាំថ្ងៃទី ០៧_២០ សីហា

**ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)**

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះឱកាសល្អបានមកដល់ហើយ ដូច្នេះលោកអ្នកត្រូវរវៀសរវៃញាប់ជើងញាប់ដៃបន្តិច ព្រោះពេលវេលាជាមាសប្រាក់ តែកុំមានចិត្តលោភលន់ដោយចង់មានចង់បានឱ្យហួសប្រមាណពេកទេ ប្រយ័ត្នអាចបង់ខាតលាភសក្ការៈ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះកាន់តែប្រកបដោយភាពផ្អែមល្ហែមបំផុត ៕

**ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះលោកអ្នកមានអារម្មណ៍ភ្លឺថ្លា គំនិត ប្រាជ្ញាឈ្លាសវៃ ទោះប្រកបកិច្ចការងារអ្វីៗក៏ដោយ ក៏ពិភាក្សាកិច្ចការងារផ្សេងក៏អាចនិយាយត្រូវរ៉ូវគ្នាដែរ ទោះជា លោកអ្នកនិយាយច្រើនបន្តិចក្តី តែច្រើនបានការទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ បើស្រលាញ់កុំទៅញឹក បើរឭកកុំទៅញយ ទើបបានសេចក្តីសុខ ៕

**ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះជួញជិតល្អជាងជួញឆ្ងាយ ព្រោះការដើរផ្លូវឆ្ងាយបើមិនបានជួបនឹងគ្រោះអាក្រក់ទេ ក៏នឹងបាននាំរឿងក្តៅក្រហាយត្រឡប់ចូលផ្ទះវិញដែរ ។ ក្រៅពីនេះ បើមានការនិយាយស្តីអ្វីចូរប្រយ័ត្នមាត់កបន្តិច ព្រោះកាលបើមានពាក្យសម្តីនិយាយជ្រុលជ្រួសតែបន្តិចអាចបង្កទៅជារឿងបាន ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អធម្មតា ៕

**ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរប្រយ័ត្នប្រយែង ជាពិសេសមុនពេលចុះហត្ថលេខា ឬផ្តិតស្នាមមេដៃលើលិខិតស្នាមផ្សេងៗត្រូវចេះពិនិត្យពិច័យឱ្យបានល្អិតល្អន់ ទើបចៀសផុតពីការខាតបង់ប្រយោជន៍ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ធ្មត់ទើបបានសេចក្តីសុខ ៕

**ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះរាល់ឧបទ្រពចង្រៃ និង រាល់ឧបសគ្គបានសាបរលាបបាត់ស្រមោលអស់រលីង ដូច្នេះលោកអ្នកអាចប្រកបកិច្ចការងារបានពេញដៃពេញជើង តែនៅពេលជាប់មមាញឹកខ្លាំង ចូរប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់នាំឱ្យខាតបង់លាភសក្ការៈ ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខសាន្តក្សេមក្សាន្ត ៕

**ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លី ផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗចូរធ្វើលិខិតស្នាមជាលាយល័ក្ខអក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឱ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខ ពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ មានភាពស្និទ្ធស្នាលដូចប្រក្រតី ៕

**ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ចំពោះអ្នកជំនួញជួញដូរនឹងមានទំនិញលក់ចេញទិញចូលឥតទំនេរដៃ ហើយទោះបីជាមានអតិថិជនខ្លះបំណុលខ្លះសងមិនគ្រប់ក្តី ក៏មិនភ័យព្រួយមានការបាត់បង់សូម្បីតែមួយកាក់មួយសេន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ បើស្គាល់ចិត្តស្គាល់ថ្លើមគ្នាយូរហើយ អាចគិតគូររឿងរៀបអាពាហ៍ពិពាហ៍បាន ៕

**ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរមានការប្រុងប្រយ័ត្នជាប់ជានិច្ច ជាពិសេសចំពោះអ្នកជំនួញជួញដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើត្រូវចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕

**ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ លោកអ្នកត្រូវចេះគ្រប់គ្រងទ្រព្យឱ្យបានគង់វង្ស ជាពិសេសអ្នករកស៊ីជួញដូរហាមបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ឱ្យអតិថិជនជំពាក់បំណុលច្រើនព្រោះអាចនឹងខាតបង់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនសូវបានសុខកាយសប្បាយចិត្តទេព្រោះមានរឿងរកាំរកូសច្រើន ៕

**ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺតែងតែបានជួបនឹងគូប្រឆាំងចេញមុខមកតតាំងគ្រប់ពេលវេលា ដូច្នេះចូរ ចេះរៀបចំជើងព្រួលទុកសំរាប់ទប់ទល់ជាមុនទើបមិនលិចលង់ទាន់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ តោងប្រយ័ត្នប្រយែងក្រែងមានអ្នកទីពាចូលជ្រៀតជ្រែក ៕

**ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺតែងបាន ជួបនូវគូប្រជែងដើងខ្លាំងចេញមុខមកតតាំង ដូច្នេះលោកអ្នកត្រូវត្រៀមលក្ខណៈទុកសម្រាប់ទប់ទល់ជាមុន ទើបមិនជួបការបរាជ័យ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែងក្រែងមាន អ្នកទីពាចូលមកជ្រៀតជ្រែក ៕

**ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)**

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារ អ្វីក៏ដោយ គឺតែងទទួលបាននូវផលសម្រេចជាប់ជានិច្ច ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយមិន ថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺប្រកបតែសេចក្តីសុខ ព្រមទាំងអាចរកចំណូលចូលផ្ទះយ៉ាងគាប់ចិត្ត ទៀតផង ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អណាស់ក្នុងរយៈពេលនេះ ៕

*សោភ័ណភាព*

ប្រសិនបើសក់អ្នកមានសភាពស្រស់ស្អាត ហើយក្រាស់តែបែរជាមានអង្គែមករខាននោះ ពិតជាកាត់បន្ថយអស់នូវជំនឿចិត្តលើខ្លួនឯងមិនតិចនោះទេ ។ ក៏ប៉ុន្តែមិនថ្វីនោះទេ ព្រោះពេលនេះយើងមានវិធីកំចាតអង្គែនេះបាន ។

## សក់ស្អាតដោយគ្មានអង្គែ

•ក៏ប៉ុន្តែជាបានដំបូងតោងធ្វើការស្វែងយល់បន្តិចថា អង្គែនេះវាមានមូលហេតុកើតចេញពីអ្វី ។ ប្រការទី១ ព្រោះអ្នកកក់សក់ញឹកញាប់ពេក ធ្វើឱ្យស្បែកក្បាលបាត់បង់អស់ភាពសំណើមរហូតក្រៀមស្ងួតនៅទីបំផុតក៏របកជ្រុះចេញមក ។ ប្រការទីពីរ ប្រភេទសាប៊ូដែលអ្នកជ្រើសរើសយកមកប្រើនោះវាមានគីរីតខ្លាំងពេក ធ្វើឱ្យកើតមានអាការប្រតិកម្មរហូតដល់អេះរបកស្បែកក្បាលចេញមក ។ ចំណែកឯវិធីបំបាត់វិញ ពុំមានអ្វីពិបាកដោយគ្រាន់តែអ្នកសាកល្បងធ្វើតាមការណែនាំខាងក្រោម :

▪ជ្រើសរើសប្រើសាប៊ូដែលមានស៊ីលីញ៉ូម ស៊ុលហ្វាត ជាចំណែកផ្សំ ព្រោះវាមានប្រសិទ្ធភាពជួយទប់ស្កាត់មេរោគផ្សិតនៅលើស្បែកក្បាល និងអាចកំចាត់បាក់តេរី បានយ៉ាងល្អបំផុត ឬក៏អាចជ្រើសសាប៊ូដែលមានគីរីតខ្សោយៗ ដែលមិនធ្វើឱ្យស្បែកក្បាលអ្នកប្រតិកម្មក៏បានដែរ ។

▪អ្នកគួរប្រើប្រាស់សាប៊ូដែលមានប្រសិទ្ធភាពការពារមេរោគផ្សិតយ៉ាងហោចណាស់មួយសប្តាហ៍ម្តង ដើម្បីឱ្យបញ្ហាបាតទៅវិញយ៉ាងឆាប់បំផុត ។

▪ចៀសវាងប្រើប្រាស់ក្រាស់សិតដែលមានមុខស្រួចៗ ឬក៏ប្រើដៃកេះលើស្បែកក្បាល ។

▪អ្នកមិនគួរទទួលទានអាហារផ្អែមៗ ឬក៏មានសារជាតិខ្លាញ់ច្រើនពេក ព្រោះសារជាតិខ្លាញ់នេះអាចនៅកកកុំលើស្បែកក្បាលបាន ។

▪មិនប្រើប្រាស់កន្សែងជូតសក់ឡុកឡំជាមួយអ្នកដទៃព្រោះអាចធ្វើឱ្យឆ្លងមេរោគផ្សិតបាន ។

▪គួរងាកមកផ្តោតការចាប់អារម្មណ៍ទទួលទានអាហារជួយបន្ថែមធាតុស័ង្កសី វីតាមីន B, C និង E ដើម្បីជួយបំប៉នស្បែកជើងឱ្យបានរឹងមាំ ។

▪ប្តូរមកទទួលទានអាហារដែលចំអិនដោយខ្លាញ់មិនកកមានដូចជាប្រេងរុក្ខជាតិ ផលិតចេញពីផ្កាឈូករ័ត្ន ។

គ្រាន់តែព្យាយាមអនុវត្តតាមការពោលណែនាំខាងក្រោមនេះហ៊ានធានាពិតជាគ្មាន រោគអង្គែមករំខានទៀតឡើយ ៕

(តមកពីទំព័រទី ០១)

## មានអ្វីប្លែកនៅហ្វីឡាដែលហ្វីយ៉ា...

សមាជិកប្រមាណ ៧០នាក់ នៃសមាគមខ្មែរ បានធ្វើការដេញដោលយ៉ាងតឹងតែងចំពោះគណ-កម្មាធិការសមាគមចាស់ នៅក្នុងបន្ទប់ប្រជុំទើបនឹងធ្វើថ្មីស្រឡាង តែគ្មានខ្យល់ដកដង្ហើមគ្រប់គ្រាន់ វាត្បិនជជែកគ្នាឡើងបែកញើសស្រោក់ ពុំមែនដោយសារខឹងសម្បារទេ តែដោយក្តៅស្អុះស្អើរទ្រាំមិនបានទៅវិញ ។ បរិយាកាសប្រែងដ៏ចម្លែកខុសសព្វមួយដង នាព្រឹកថ្ងៃសៅរ៍នោះ ។ សិរិត សម បាននិយាយថា : ខ្លួនមកឈរឈ្មោះសាជាថ្មី ពីព្រោះកិច្ចការបានចាប់ផ្តើមហើយ មិនទាន់ចេញជាលទ្ធផលតាមបំណងចង់ពង្រីកឥទ្ធិពលសមាគមខ្មែរ ហើយជាពិសេសចង់ទប់ស្កាត់ការប្រើប្រាស់សមាគមឱ្យមានជាទំនាស់ក្នុងការរកប្រយោជន៍ ។

គណៈកម្មាធិការនាយកថ្មីរបស់សមាគមខ្មែរ

ដែលរៀងរាល់មហាសន្និបាទ គេលំបាកនឹងរកបេក្ខជនមកឈរឈ្មោះជាថ្នាក់ដឹកនាំ តែឆ្នាំនេះស្រាប់តែគេនាំគ្នាប្រជែងយកតំណែង រហូតដល់មានការជម្រុះសមាជិកគណកម្មាធិការចេញខ្លះ ដោយមហាសន្និបាតទៀតផង ។

សិរិត សម គឺជាបេក្ខជនប្រធានសមាគមប្រជែងគ្នានឹងបេក្ខជនម្នាក់ទៀត យ៉ាងប្រឹង

នៅការបោះឆ្នោតជុំទី២ សិរិត សម បានទទួលជោគជ័យ ហើយថ្លែងថា "ជាជ័យជំនះហួសពីការស្មាន" ហើយបានសរសើរគណកម្មាធិការនាយកថា បានបោះឆ្នោតឱ្យខ្លួន ពីព្រោះតែឧត្តមគតិ ពុំមែនដោយសារមិត្តភ័ក្ត្រនោះទេ ។

កិច្ចប្រជុំចប់ស្ងប់ពីការជ្រួលច្របល់ ទើបទាំង

**តទៅទំព័រទី ២០**



## ទំព័រ Classify

**អង្គការចាងណា ?**

ជាសៀវភៅកំណត់ត្រានូវរឿងពិត ដែលបានកើតឡើងនៅក្នុងប្រទេសកម្ពុជា ជំនាន់ខ្មែរក្រហមកាន់អំណាច ហើយអ្នកនិពន្ធវែកមុខអ្នកណាដែលជាឃាតករ ដែលគេឱ្យឈ្មោះថាអង្គការនោះ ។ សៀវភៅរូមមាន ៣ក្បាល :

**ភ្នំពេញមុនឆ្នាំ ១៩៥៥**

អ្នកនិពន្ធ កែវ ប៊ុនធឿន បានកត់ត្រាការផ្លាស់ប្តូរមុខមាត់ទីក្រុងភ្នំពេញ ពីជំនាន់មួយទៅជំនាន់មួយ និងហេតុការណ៍ដែលបានកើតឡើងក្នុងជំនាន់នោះ ។

**ទស្សនាវិជ្ជមានុស្ស :**

លោក បណ្ឌិត ឌុក រ៉ាស៊ី ធ្វើអត្ថាធិប្បាយពីសិទ្ធិមនុស្ស ប្រវត្តិនៃសិទ្ធិមនុស្ស រហូតដល់យកសិទ្ធិមនុស្សធ្វើជាមូលដ្ឋាន ដើម្បីរៀបចំសង្គម រៀបចំច្បាប់រដ្ឋ ធ្វើឱ្យប្រទេសជាតិ មានភាពសុខដុមរម្មនា ។ សូមទំនាក់ទំនងមកលោក **គីម ភៀន** តាមលេខ : **215-680-2059.**



## សូមជួយទិញសៀវភៅខ្មែរ

Danse classique khmère

10 $ + ថ្លៃផ្ញើរ

① CAMBODGE

② CAMBODGE

**ប្រវត្តិសាស្ត្រនៃកម្ពុជា**

លោក វ៉ាន់ឌីកាអុន ទើបនឹងសរសេរសៀវភៅប្រវត្តិសាស្ត្រនេះ ពីសម័យអាណានិគមបារាំងមកដល់បច្ចុប្បន្នកាល ។ ភាគទី១/ភាគទី២ចេញផ្សាយរួចហើយ នៅប្រទេសបារាំង ។

Email. VANDY_KAONN@YAHOO.COM

**ប្រវត្តិសាស្ត្រខ្មែរបច្ចុប្បន្ន**

ថាស ស៊ីឌី ដែលរៀបរៀងដោយ គិន សំអុន ហើយផ្សព្វផ្សាយនៅវិទ្យុសម្លេងខ្មែរ-អាមេរិកាំង ។ ថាស ស៊ីឌី ចំនួនបួនម៉ោងស្តីពីប្រវត្តិកម្ពុជា ចាប់តាំងពីសម្តេចនរោត្តម សីហនុបានធ្លាក់ពីអំណាចឆ្នាំ ១៩៧៥ មកដល់ឆ្នាំ ២០០៤ ។

ទូរស័ព្ទ 215-680-2059

| មានលក់នៅស្រុកអាមេរិក | ស្រុកបារាំង |
|---|---|
| -សាក៏មាំងឌី (ខ្មែរ)............10$ | ........10€ |
| -របាំក្បាច់បុរាណ ភ្លេង ស្មោន (បារាំង)............10$ | ........10€ |
| -រឿងរាមកេរ្តិ៍ (ខ្មែរ-បារាំង)............10$ | ........10€ |
| -រាមកេរ្តិ៍តាមផ្ទាំងវិហារព្រះកែវមរកត (ខ្មែរ-បារាំង)...10$ | ........10€ |
| 1-CAMBODGE (Français) ............10$ | ........10€ |
| 2-CAMBODGE (Français) ............10$ | ........10€ |

**USA**

The Khmer post

Call KIM PHIEN 215-680-2059

FRANCE

Cambodiana Vidéo

22.rue du Disque 75013 Paris

Tél : 01 45 84 07 57

**បំណុលបញ្ជាកាសែតខ្មែរប៉ុស្តិ៍**

ឈ្មោះ និងអាស័យដ្ឋានរបស់ខ្ញុំ

ឈ្មោះ :......................................................

អាស័យដ្ឋាន......................................................

**ខ្ញុំចង់បាន :**

☐ កាសែតខ្មែរប៉ុស្តិ៍ ១ខែ មាន២លេខ ៦ខែ $30 ១២ខែ $60

☐ សៀវភៅឈ្មោះ..............................តម្លៃ $......................

☐ ស៊ីឌីប្រវត្តិសាស្ត្រខ្មែរ ៤ ម៉ោង តម្លៃមួយសិត $30

ខ្ញុំភ្ជាប់សែក ឬ មនីអដ័រ មក U.A.M.G តម្លៃ $..............

ផ្ញើមក U.A.M.G 438 LINDLEY AVE .PHILADELPHIA PA 19120

Phone : KIM PHIEN 215-680-2059 or Saben 267 253 3974

(តមកពីទំព័រទី ០១)

# រ៉ូប៊ើត ពើទីត លាលែងពីសាលាក្តី...

របស់មន្រ្តីមួយចំនួន និងការជ្រៀតជ្រែកផ្នែកនយោបាយរបស់អ្នកដឹកនាំនៅក្នុងប្រទេសកម្ពុជា ដែលព្យាយាមរារាំងដំណើរការសាលាក្តីមិនឱ្យមានដំណើរការទៅមុខដោយរលូននោះ ។

នៅក្នុងសន្និសីទកាសែតកន្លងមក លោក រ៉ូប៊ើត ពើទីត បានលើកឡើងថា "ការសុំលាលែងនេះដោយសារមូលហេតុផ្ទាល់ខ្លួនចាំបាច់ និងបញ្ហាគ្រួសារនៅឯប្រទេសកាណាដា" ការលាលែងរបស់ខ្ញុំមិនធ្វើឱ្យប៉ះពាល់សាលាក្តីខ្មែរក្រហមឡើយ ។ ការសម្រេចចិត្តលាឈប់ពីការងារដ៏ឧត្តុង្គឧត្តមនេះគឺជារឿងមួយគួរឱ្យសោកស្តាយ ប៉ុន្តែការសម្រេចចិត្តនេះជារឿងត្រឹមត្រូវដែលតម្រូវឱ្យលោកត្រូវតែលាឈប់ពីការងារនេះ ។

ការសម្រេចចាកចេញពីតួនាទីដ៏ខ្ពង់ខ្ពស់របស់សហព្រះរាជអាជ្ញាអន្តរជាតិរូបនេះ ក្រុមអង្គការសមាគមដែលឃ្លាំមើលដំណើរការសាលាក្តីខ្មែរក្រហម បានចេញសេចក្តីថ្លែងការរួមគ្នាបង្ហាញពីកង្វល់យ៉ាងខ្លាំង ដែលការចាកចេញនេះវាអាចបង្កើតនូវអវត្តមាននៃតួនាទីអ្នកដឹកនាំនៅក្នុងការិយាល័យសហព្រះរាជអាជ្ញាបណ្តោយឱ្យមានការខ្វែងគំនិតគ្នារវាងសហព្រះរាជអាជ្ញាអន្តរជាតិ និងសហព្រះរាជអាជ្ញាកម្ពុជាទៅលើការសម្រេចនាំខ្លួនជនសង្ស័យបន្ថែម6នាក់ទៀត មកកាត់ក្តី ។

សេចក្តីថ្លែងការណ៍នេះក៏បានបញ្ជាក់ថា អវត្តមានរបស់សហព្រះរាជអាជ្ញាវាអាចធ្វើឱ្យការបញ្ចប់សំនុំរឿងមិនទាន់ពេលវេលា ប៉ះពាល់ដល់គំនិតផ្តួចផ្តើមរបស់លោក រ៉ូប៊ើត ពើទីត ក្នុងការបង្កើតសាលាក្តីកន្លងមក ។ ជាពិសេស ក្រុមអង្គការទាំងនោះក៏



សវនាការ ឌុច នៅសាលាក្តីខ្មែរក្រហម

បានធ្វើការអំពាវនាវឱ្យអង្គការសហប្រជាជាតិជ្រើសរើសសហព្រះរាជអាជ្ញា អន្តរជាតិឱ្យបានឆាប់ដើម្បីជំនួសតំណែងលោក រ៉ូប៊ើត ពើទីត និងយកអ្នកណាដែលមានឯករាជ្យភាព បទពិសោធន៍ល្អ គឺមិនត្រូវពន្យារពេលនាំ ឱ្យប៉ះពាល់នូវដំណើរការនៃការកាត់ក្តីនោះទេ ។

ក្តីកង្វល់របស់អង្គការសង្គម ស៊ីវិលនេះ ត្រូវបានលោកស្រី ជា លាង សហព្រះរាជអាជ្ញាជាតិ និងលោក វីល្លៀមស្មិត សហព្រះរាជអាជ្ញាអន្តរជាតិថា ការចាកចេញរបស់គាត់ រ៉ូប៊ើត ពើទីត មិនប៉ះពាល់ដល់ដំណើរការសាលាក្តី គឺសហការីយើងកំពុងដំណើរការយ៉ាងសកម្មក្នុងការកាត់សេចក្តី កាំង ហ្គេចអ៊ាវ ហៅ ឌុច អតីតប្រធានគុកទួលស្លែង (ម.21) ដដែល ។

អ្នកវិភាគឯករាជ្យខ្លះបានដាក់ការសង្ស័យថា ការសម្រេចចិត្តលាឈប់ពីការងាររបស់លោក រ៉ូប៊ើត ពើទីត វាបណ្តាលមកពីការមិនចុះសម្រុងគ្នារវាងលោក និងលោកស្រី ជា លាង សហព្រះរាជអាជ្ញាជាតិ ក្នុងសំនុំរឿងចោទប្រកាន់ជនសង្ស័យខ្មែរក្រហមបន្ថែមទៀត មកបំភ្លឺដែលជនសង្ស័យត្រូវឡើងតុលាការមានតួនាទីជាថ្នាក់ដឹកនាំប្រទេសជាតិបច្ចុប្បន្ន និងខ្លះជាឧត្តមសេនីយ៍ចូលនិវត្តន៍ ។ ការខ្វែងគំនិតគ្នានេះនៅជាប់គាំងមិនត្រូវបានអង្គបុរេជំនុំជម្រះលើកយកមកកាត់ក្តីឡើយ ។

សំណើរបស់សហព្រះរាជអាជ្ញាអន្តរជាតិរូបនេះ ត្រូវបាន ហ៊ុន សែន អតីតមេខ្មែរក្រហម និងជានាយករដ្ឋមន្ត្រីបច្ចុប្បន្នធ្វើជាជំទាស់មិនឱ្យមានការកាត់ទោស ឬនាំខ្លួនជនសង្ស័យបន្ថែមទៀតទេ ។ ហ៊ុន សែន បញ្ជាក់ថា បើសិនជាមានការនាំខ្លួនជនសង្ស័យបន្ថែមទៀតនោះវានឹងបង្កឱ្យមានការផ្ទុះសង្គ្រាមនៅកម្ពុជាម្តងទៀត បង្កើតនូវភាពវឹកវរក្នុងប្រទេសជាក់ជាមិនខានឡើយ ។ ការជំទាស់របស់នាយករដ្ឋមន្ត្រីនេះវាដូចនឹងអតីតយោធាខ្មែរក្រហមជាន់ខ្ពស់ មាស មុត នៅតំបន់សំឡូតដែលជាជនសង្ស័យត្រូវបាននាំខ្លួនផងដែរ ។

ជាប្រតិកម្មនឹងការលើកឡើងរបស់នាយករដ្ឋមន្ត្រីខ្មែរនោះ កញ្ញា សេង ធារី អតីតនាយិកាមជ្ឈមណ្ឌលអភិវឌ្ឍន៍សង្គមក៏បានធ្វើការរិះគន់ចំពោះជំហររបស់ ហ៊ុន សែន ថា នេះជាការរារាំងមិនឱ្យនាំខ្លួនអតីតមេដឹកនាំខ្មែរក្រហម6នាក់ផ្សេងទៀតដែលជាសញ្ញានៃការជ្រៀតជ្រែកនយោបាយរបស់នាយករដ្ឋមន្ត្រីទៅក្នុងកិច្ចការបច្ចេកទេសច្បាប់របស់តុលាការខ្មែរក្រហម ហើយការធ្វើបែបនេះ ជាអំពើខុសច្បាប់ធ្ងន់ធ្ងរណាស់ ។

ក្នុងដំណើរការចូលរួមបុណ្យឯករាជ្យបារាំងកាលពីថ្មីៗនេះ ហ៊ុន សែន បានប្រាប់ទៅ ប្រធានាធិបតីបារាំងលោក នីកូឡា សាគូហ្ស៊ី ថាការកាត់ទោសអតីតមេដឹកនាំខ្មែរក្រហម5នាក់នេះវាគ្រប់គ្រាន់ហើយ គឺមិនចាំបាច់នាំខ្លួនជនសង្ស័យបន្ថែមទៀតទេ ។ ការលើកឡើងរបស់ ហ៊ុន សែន ត្រូវបានលោក ប្រេម អាដាម ប្រធានអង្គការ Human Right Watch ប្រចាំនៅតំបន់អាស៊ីអាគ្នេយ៍ព្រមានថា សាលាក្តីខ្មែរក្រហមដែលស្ថិតនៅក្រោមសម្ពាធនយោបាយអាចនឹងរលាយសូន្យទៅវិញ ។

លោក ប្រេម អាដាម បានសម្តែងនូវការងឿងឆ្ងល់តាមរយៈសេចក្តីប្រកាសព័ត៌មានរបស់ខ្លួនថា ហ៊ុន សែន គ្មានតួនាទីនៅក្នុងសាលាក្តីខ្មែរក្រហមទេ ប៉ុន្តែលោកបានប្រើប្រាស់ឥទ្ធិពលរបស់ខ្លួនទៅលើបុគ្គលិកដែលគ្រប់គ្រងក្នុងសាលាក្តីដើម្បីជ្រៀតជ្រែកទៅក្នុងការងាររបស់តុលាការខ្មែរក្រហម ។

ជាមួយគ្នានេះដែរ លោក ប្រេម អាដាម ក៏បានផ្តល់ជាអនុសាសន៍ដល់អង្គការសហប្រជាជាតិចាំបាច់ត្រូវតែប្រកាន់ជំហររឹងប៉ឹងរបស់ខ្លួនដើម្បីឱ្យតុលាការកូនកាត់មួយនេះ កាត់ក្តីអតីតមេដឹកនាំខ្មែរក្រហមក្នុងភាពឯករាជ្យ មិនលំអៀងពីគោលការណ៍ច្បាប់ និងផ្តល់យុត្តិធម៌ជាសាកលដល់ពលរដ្ឋខ្មែរ ។

គួរបញ្ជាក់ថា សហព្រះរាជអាជ្ញាអន្តរជាតិ រ៉ូប៊ើត ពើទីត បានមកបម្រើការនៅសាលាក្តីខ្មែរក្រហមតាំងពីថ្ងៃទី3 ខែកក្កដា ឆ្នាំ 2006 ។ លោកធ្លាប់បម្រើការក្នុងវិស័យតុលាការរយៈពេលជិត20ឆ្នាំ នៅប្រទេសកាណាដា និងនៅប្រទេសរវ៉ាន់ដា យូហ្គោស្លាវី សេរ៉ាឡេអូន និងប្រទេសទីម័រខាងកើត ។

កាលពីថ្មីៗនេះលោកស្រី យូកុ ម៉ាដា ជនជាតិជប៉ុន ធ្លាប់ធ្វើជាអ្នកកាសែតនៅប្រទេសកម្ពុជា និងបង្កើតអង្គការក្រៅរដ្ឋាភិបាលឈ្មោះថា "ស្ត្រីប្រឆាំងនឹងភាពស្ងៀមស្ងាត់ " បានចូលកាន់តំណែងរបស់លោក ភីធ័រ ហ្វូស័រ ជាអ្នកនាំពាក្យភាគីអន្តរជាតិនៅសាលាក្តីខ្មែរក្រហម ដែលបានដាក់ពាក្យសុំលាលែងកាលពីខែធ្នូ ឆ្នាំ2008 ៕

# វិបត្តិថវិកាបង្ខំឱ្យលុបបំបាត់តំណែងការងារ និងបុគ្គលិក



*●●● ចៅហ្វាយក្រុងហ្វីឡា Nutter បានស្នើច្បាប់ សុំដម្លើង ពាក់ លើថ្លៃទិញ ១% និងកែទម្រង់ប្រាក់ចូលនិវត្តន៍ ។ សភាមិនឱ្យទេនោះ នឹងមានការកាត់បន្ថយបុគ្គលិកប៉ូលិស ១ពាន់នាក់ ដែលនឹងប៉ះពាល់សន្តិសុខហ្វីឡាខាងជើង ។ នៅឡុងប៊ិច ក៏មានឱនភាពដូចគ្នានេះដែរ :*

**Long Beach. ខ្មែរប៉ុស្តិ៍ : មាជ សុវណ្ណារ៉ា**

វិបត្តិហិរញ្ញវត្ថុ ធ្វើឱ្យសាលាក្រុង Long Beach ប្រកាសភាពអាសន្នពីការកាត់បន្ថយគម្រោងថវិកាចំណាយប្រចាំឆ្នាំ ដើម្បីស្វែងរកដំណោះស្រាយនៃឱនភាពថវិកាដែលកំពុងតែប្រឈមមុខក្នុងស្ថានការណ៍ដ៏គ្រោះថ្នាក់ចំពោះរដ្ឋាភិបាលតំបន់មួយនេះ ។ វិបត្តិឱនភាពថវិកាបានបង្ខំឱ្យសាលាក្រុង Long Beach លុបបំបាត់នូវស្ថាប័នរដ្ឋរបស់ខ្លួន និងបុគ្គលិកជាច្រើននាក់ចាប់ពីខែសីហា ឆ្នាំ 2009 នេះទៅ ។

ចៅហ្វាយក្រុង Bob Foster បានថ្លែងក្នុងសន្និសីទសារព័ត៌មាន នាសាលាក្រុង Long Beach កាលពីថ្ងៃទី30 ខែកក្កដា ឆ្នាំ 2009 ឱ្យដឹងថា ការស្នើកាត់គម្រោងថវិកាក្រុង Long Beach នឹងធ្វើឱ្យមានភាពប្រសើរឡើងដែលសង្ឃឹមថា នឹងធ្វើឱ្យមានឱនភាពថវិកាតិចចុះក្នុងរវាង2ឆ្នាំនៃសារពើពន្ធខាងមុខនេះ ។ "យើងនឹងឆ្លងផុតវិបត្តិនេះ យើងចាត់ចែងវាឱ្យបានល្អ និងយើងប្រឈមមុខនឹងការពិត ហើយយើងនឹងមិនធ្វើអ្វីដែលរដ្ឋកំពុងធ្វើនោះទេ" អ្នកណាបានបើកកកាយគម្រោងរបស់រដ្ឋរឿងខ្ចីប្រាក់រដ្ឋាភិបាលក្រុងនានានោះ យើងកំពុងចាត់ការវាផ្ទាល់ជាមួយនឹងបញ្ហាគម្រោងរបស់យើង ហើយប្រឈមមុខផ្ទាល់ជាមួយវាចំៗតែម្តង ដែលយើងមិនអាចចៀសវាងរឿងនេះបានទេ ។

ស្ថាប័នរដ្ឋរបស់ក្រុង Long Beach ចំនួន 312តំណែង និងបុគ្គលិកចំនួន161នាក់ ដោយរួមទាំង Police 38នាក់ផង ត្រូវបានឱ្យបញ្ឈប់ពីការងារ (Layoff) ។ ដោយបញ្ហា តវិបត្តិថវិកានេះផងដែរ រដ្ឋាភិបាលតំបន់ Long Beach នេះក៏បានបន្ថែមថ្ងៃឈប់សំរាក ការងារមួយថ្ងៃទៀត គឺថ្ងៃសុក្រដោយមិនឱ្យបុគ្គលិករដ្ឋនៅតាមស្ថាប័នមួយចំនួនធ្វើការ ដែលការបន្ថែមថ្ងៃឈប់ធ្វើការមិនបង់ថ្លៃ (Unpaid) ដល់បុគ្គលិកធ្វើឱ្យក្រុង Long Beach សន្សំថវិកាបាន4លានដុល្លារអាមេរិក ។ ចំណែកការកាត់បន្ថយការចំណាយចំពោះការលុបបំបាត់តំណែងការងារ និងបុគ្គលិកដោយការកង្វះថវិកាចំពោះមុខក្នុងគម្រោងថវិកាប្រចាំឆ្នាំ2008-2009 ក្នុងខែ កក្កដា, សីហា និងខែកញ្ញា ឆ្នាំ2009 នេះចំនួន 19.2លានដុល្លារអាមេរិក ។

ចំណែកខ្ទង់ថវិកាចំណាយសំរាប់សិល្បៈគំនូរតាមទីសាធារណៈ ពុំត្រូវបានគេដាក់ក្នុងគម្រោងចាយវាយប្រចាំឆ្នាំទៀតឡើយ ។ ចំនួនទឹកប្រាក់សម្រាប់កម្មវិធីអភិវឌ្ឍន៍អប់រំ និងសេវាកម្មសាធារណៈនានាចំនួន156 គម្រោង



ចាយវាយត្រូវកាត់ផ្តាច់ ។ ក្រុង Long Beach បានកាត់បន្ថយគម្រោងថវិកាប្រចាំឆ្នាំសំរាប់ទីកប្រាក់សារពើពន្ធ ឆ្នាំ 2009-2010 ចំនួន 6% ដែលធ្វើឱ្យមានឱនភាពថវិកាប្រមាណជាង 38លានដុល្លារ ។

ដោយសារវិបត្តិហិរញ្ញវត្ថុនោះកញ្ចប់ថវិការបស់រដ្ឋាភិបាល តំបន់មួយនេះដែលបានអនុម័តឱ្យ ប្រើប្រាស់សំរាប់ឆ្នាំ 2008-2009 ប្រមាណ 403.9លានដុល្លារ ត្រូវបានកាត់បន្ថយឱ្យចំណាយមកនៅត្រឹមតែ380លានដុល្លារ ។

ក្នុងរយៈពេល5ឆ្នាំចុងក្រោយនេះ ចាប់តាំងពីឆ្នាំ2004 ក្រុង Long Beach បានកាត់បន្ថយពន្ធអាករជាបន្តបន្ទាប់ពីខ្ទង់កញ្ចប់ថវិការបស់ខ្លួនប្រចាំឆ្នាំឱ្យធ្លាក់ចុះអស់111.5លានដុល្លារ ។

ការប្រឈមមុខវិបត្តិហិរញ្ញវត្ថុមិនថារដ្ឋាភិបាលសហព័ន្ធ រដ្ឋាភិបាលរដ្ឋ ឬរដ្ឋាភិបាលមូលដ្ឋានតំបន់ក្តីក្រុង Long Beach បានបាត់បង់ថវិកាប្រមាណ30លានដុល្លារចេញពីគម្រោងថវិកាសំរាប់ទីភ្នាក់ងារការស្តារ និងអភិវឌ្ឍន៍ឡើងវិញរបស់ក្រុងខ្លួនដែលធ្លាប់តែផ្តល់ថវិកាឱ្យពីរដ្ឋាភិបាលរដ្ឋ California ។ ហើយវាក៏នាំឱ្យប៉ះពាល់ទៅដល់ស្ថាប័នសុខាភិបាលប្រចាំក្រុងផងដែរប្រមាណ 2.5លានដុល្លារអាមេរិកចាប់ពីឆ្នាំសារពើពន្ធ 2009-2010 ។

គួរបញ្ជាក់ថា បញ្ហាឱនភាពថវិការបស់អាជ្ញាធរក្រុង Long Beach ដែលបានកាត់បន្ថយមុខតំណែង និងនិយោជិករបស់ខ្លួននោះ ។ ក៏ពួកអ្នកដឹកនាំនៃរដ្ឋាភិបាលតំបន់មួយនេះ បានកំពុងស្វះស្វែងធ្វើការចរចាជាមួយរដ្ឋាភិបាលតំបន់នានា និងស្ថា ប័នសហជីពដើម្បីសុំឱ្យជួយសំរួលទទួលយកបុគ្គលិករបស់ខ្លួនជួលយកទៅធ្វើការ បន្តបន្ទាប់ពីពួកគេទាំងនោះ ត្រូវបានបញ្ចប់ឈប់ឱ្យធ្វើការ (Layoff) នៅក្នុងស្ថាប័នរដ្ឋនៃក្រុង Long Beach ៕